ខ្មែរប៉ុស្តិ៍ ស.រ.អា.
KhmerPost USA
Printing The Cambodian World News
VOL. 05 ISSUE 84 June 03th - 16th, 2011
សុបិន : (267) 253-3947, សែម : (781) 244-0522
MASSACHUSETTS
217 APPLETON ST.
LOWELL, MA 01852
PENNSYLVANIA
438 LINDLEY AVE.
PHILADELPHIA, PA 19120
RHODE ISLAND
NEW JERSEY

| មាតិការឿង | ទំព័រ |
|---|---|


# សម្ភាសន៍ជាមួយលោក សម រង្ស៊ី នៅហ្វីឡាដែលហ្វៀ

**ដោយ : ពិន សំខុន**

*លោក សម រង្ស៊ី ជាប្រធានគណបក្ស សម រង្ស៊ី បាន អញ្ជើញមកហ្វីឡាដែលហ្វៀកាលពីថ្ងៃសុក្រ ទី២៧ ខែឧសភា ឆ្នាំ២០១១ ក្នុងដំណើរមកញូវយ៉ក ទៅកាន់រដ្ឋធានីវ៉ាស៊ីនតុន បានផ្តល់បទសម្ភាសន៍មួយដល់ខ្មែរប៉ុស្តិ៍ មុននឹងទៅជួបសហគមន៍ខ្មែរ ដែលរង់ចាំស្តាប់សេចក្តីរាយការណ៍របស់ប្រធានគណបក្សប្រឆាំងរូបនេះ នៅសាលប្រជុំវត្តព្រះពុទ្ធរង្ស៊ី នៅម៉ោង៦ល្ងាច ។*


លោក សម រង្ស៊ី

**ស្ន** : តើលោក សម រង្ស៊ី អញ្ជើញមកហ្វីឡាដែលហ្វៀនេះមានបំណងធំអ្វីដែរ?

**សម រង្ស៊ី** : ខ្ញុំមកថ្វាយបង្គំព្រះសង្ឃមកជួបជុំបងប្អូនខ្មែរយើង និងជួបអ្នកកាសែតដូចលោក សំខុន នេះ ។

**ស្ន** : លោក សម រង្ស៊ី កំពុងស្ថិតនៅក្រៅប្រទេស តើមានសង្ឃឹមថា អាចចូលទៅកាន់ប្រទេសវិញបានទេ?

**សម រង្ស៊ី** : វិញ្ញាណខ្ញុំ ព្រលឹងខ្ញុំគឺនៅប្រទេសកម្ពុជា ឥតមានទៅណាទេ នៅជាប់ជាមួយពលរដ្ឋជានិច្ច រាល់ថ្ងៃខ្ញុំចូលរួមជាមួយពលរដ្ឋនៅកម្ពុជា គ្រប់ខេត្តក្រុងទាំងអស់ តាមប្រព័ន្ធវីដេអូកុងហ្វ្រិន រួមប្រជុំដោយឮសម្លេងផង ឃើញរូបផង សួរឆ្លើយឆ្លងគ្នា ដូច្នេះការងារនៅតែបន្តជាធម្មតាជានិច្ចកាល ហើយជាមួយសហការីខ្ញុំក៏ធ្វើការរឹតតែសកម្មជាងមុនថែមទៀត បំពេញតួនាទីជាតំណាងរាស្ត្រជាមួយតំណាងរាស្ត្រខ្មែរ២៥រូបទៀត ហើយនឹងមានសមាជិកក្រុមប្រឹក្សាឃុំ សង្កាត់ជាងពីរពាន់នាក់ទៀត នៅសម័យនេះយើងចង់ធ្វើការនៅកន្លែងណាក៏បានដែរ គ្មានអ្វីផ្លាស់ប្តូរទេ... ហើយការងារធ្វើរឹតតែមានប្រសិទ្ធភាពថែមទៀត ដោយយើងបានធ្វើដំណើរលឿន ហើយទៅបានគ្រប់កន្លែងថែមទៀត ។

**ស្ន** : មានដំណឹងថ្មីមួយថា លោកមានសង្ឃឹមនឹងបានត្រឡប់ទៅកម្ពុជាវិញបាន ដោយសារមានសម្ពាធពីសហគមន៍អន្តរជាតិ (តទៅទំព័រទី ០៣)

# នយោបាយនៅកម្ពុជា

**I. កឹម សុខា - ហ៊ុន សែន**

កាសែត "ដើមអម្ពិល" នៅភ្នំពេញបានបញ្ចេញអត្ថបទសន្ទនាតាមទូរស័ព្ទរវាងលោក ហ៊ុន សែន និងលោក កឹម សុខា កាលពីឆ្នាំ២០០៧ មុនពេលសមាជទី១របស់គណបក្សសិទ្ធិមនុស្ស នៅពហុកីឡាដ្ឋានជាតិភ្នំពេញ នៅថ្ងៃទី២៩ ខែឧសភា ឆ្នាំ២០១១ នេះ ។ (តទៅទំព័រទី ០៦)


លោក កឹម សុខា




# ហួ ឌួង ពេទ្យធ្មេញសម្រាប់គ្រួសារ

## 466 Merrimack Street. Lowell, MA 01854
## ( Near City Hall )/ 978-441-1005

## HOA DUONG, D.M.D., P.C.
**GENERAL DENTISTRY**

គ្រូពេទ្យជំនាញនិងមានបទពិសោធន៍
ច្រើនឆ្នាំក្នុងការពិនិត្យ
ថែរក្សា និងព្យាបាលជម្ងឺធ្មេញទូទៅ



Open: Monday, Tuesday, Wednesday, and Friday
from 10 a.m. – 6 p.m.
Saturday: from 10 a.m. – 4 p.m.
Closed: Thursday & Sunday
We accept all dental insurance & Medicaid



យើងទទួលយកគ្រប់ក្រុមហ៊ុន
ធានារ៉ាប់រងសុខភាព និងការធានារ៉ាប់រង
សុខភាពមនុស្សចាស់

**យើងបើកទ្វារទទួលភ្ញៀវ ៥ថ្ងៃ ក្នុងមួយសប្តាហ៍**
**បិទទ្វារ : ថ្ងៃព្រហស្បត្តិ៍ និងថ្ងៃ អាទិត្យ**

**ទូរស័ព្ទដើម្បីណាត់ជួប (978) 441-1005**
**ម៉ោងធ្វើការពីម៉ោង 10ព្រឹក ដល់ 6ល្ងាច**
**ថ្ងៃសៅរ៍ ពីម៉ោង 10ព្រឹក ដល់ 4រសៀល**
**យើងមានបុគ្គលិកនិយាយភាសាខ្មែរ**

តមកពីទំព័រទី ០១

# សម្ភាសន៍ជាមួយលោក សម រង្ស៊ី ...

ចង់ឃើញលោកត្រឡប់ទៅធ្វើការនៅកម្ពុជាវិញ តើសម្ថាធនោះជាអ្វីទៅ?

**សម រង្ស៊ី** : ឃើញមានជាក់ស្តែងអ៊ីចឹងមែន គេចង់ឃើញការបោះឆ្នោតនៅកម្ពុជា មានគួរសំខាន់ៗចូលប្រគួត ដូចជានៅសភាអឺរ៉ុប គេបានសរសេរញត្តិឱ្យទៅកម្ពុជា ចង់ឱ្យគណបក្សខ្មែរទាំងអស់មានសិទ្ធិស្មើៗគ្នាចូលរួមបោះឆ្នោត... មានតំណាងរាស្ត្រអ្នកស្រី សេស៊ីលីយ៉ាវិនស្ត្រំ ពីប្រទេសស៊ុយអែដ តំណាងឱ្យតំណាងរាស្ត្រអឺរ៉ុប បានទាមទារថាត្រូវតែ សម រង្ស៊ី ចូលរួមក្នុងការបោះឆ្នោតជាដាច់ខាត ហើយរដ្ឋាភិបាលបារាំង សហភាពអន្តរសភា អ៊ាអីស៊ី អាំងទ័រណាសុនល់ ការបានចេញសេចក្តីថ្លែងការណ៍ ហើយសភាអឺរ៉ុបគេបានអនុម័តជាញត្តិឱ្យខ្ញុំបានទៅចូលរួមក្នុងការបោះឆ្នោតខាងមុខនេះ... ដូច្នេះវាមានចរន្ត វាមានចលនា វាមានសំពាធអ៊ីចឹងមែនទៅលើរដ្ឋាភិបាលលោក ហ៊ុន សែន សព្វថ្ងៃឱ្យគោរពសិទ្ធិអ្នកតំណាងរាស្ត្រ ដែលរាស្ត្របានបោះឆ្នោតឱ្យ មិនមែនទរណាមួយចង់ដកសិទ្ធិតំណាងរាស្ត្រនៅក្នុងគណបក្សផ្សេងណាមួយបានអ៊ីចឹងទេ ដែលផ្ទុយពីលទ្ធិប្រជាធិបតេយ្យ... នេះជាការល្អមួយដែលមានការតវ៉ាទូទាំងពិភពលោក ទាមទារឱ្យតំណាងរាស្ត្រខ្មែរអាចធ្វើការបោះឆ្នោតបានស្មើមុខគ្នានៅកន្លែងរបស់ខ្លួន គឺនៅកម្ពុជា ។

**ស្នរ** : លោកឥតបាននិយាយពីការគាំទ្ររបស់សហរដ្ឋអាមេរិក តើមានឥរិយាបទយ៉ាងម៉េចដែរ?

**សម រង្ស៊ី** : ស.រ.អា ក៏បានបញ្ជាក់អ៊ីចឹងដែរ យើងមានតំណាងរាស្ត្រសញ្ជាតិខ្មែរផង អាមេរិកាំង ដូចអ្នកស្រីមូរ សុខហួរ បានជួបជាមួយនឹងអ្នកស្រីរដ្ឋលេខាធិការអាមេរិកាំង ហ៊ីឡារី គ្លីនតុន ជាញឹកញាប់ ជួបនឹងមន្ត្រីឯទៀតៗ ជួបតំណាងរាស្ត្រ ជួបគណប្រតិភូព្រឹទ្ធសភាទៅប្រទេសកម្ពុជា គេតែងតែនិយាយថា ចង់ឱ្យកម្ពុជាប្រកាន់លទ្ធិប្រជាធិបតីពិតប្រាកដ ចង់ឱ្យគណបក្សទាំងអស់ដើរតួនាទីត្រឹមត្រូវ គឺចេះគោរពសិទ្ធិគ្នាទៅវិញទៅមកគេទៅកម្ពុជា គេតែងតែទៅជួបគណបក្សប្រឆាំងជានិច្ច បានន័យថា គេបង្ហាញការគាំទ្រពីសហរដ្ឋអាមេរិក និងពីប្រទេសឯទៀតៗ ក្នុងពិភពលោក ។

**ស្នរ** : ប្រទេសកម្ពុជាជំពាក់លុយសហរដ្ឋអាមេរិក ហើយបានស្នើឱ្យម្ចាស់បំណុលរំលូសប្រាក់ជំពាក់នោះចោលចេញ តើលោកមានដឹងថា សហរដ្ឋអាមេរិកអាចនឹងស្នើលក្ខខណ្ឌមួយឱ្យលោក សម រង្ស៊ី អាចត្រឡប់ទៅកម្ពុជាវិញ ដោយសុវត្ថិភាពនៅក្នុងការចរចារនោះដែរឬទេ ?

**សម រង្ស៊ី** : ខ្ញុំមិនដឹងថាមានលក្ខខណ្ឌបែបហ្នឹងទេ តែអាមេរិកាំងអាចមានឥទ្ធិពលច្រើន ដូចជា សេដ្ឋកិច្ច នយោបាយ ។ល។ លើកម្ពុជា ខ្ញុំមិនដឹងទេ តែវាអាចមានមែន ។

**ស្នរ** : មានព្រឹត្តិការណ៍មួយចំនួន ដែលកំពុងកើតនៅលើពិភពលោកនេះ គឺប្រទេសលីប៊ី ប្រទេសយេម៉ែនមេដឹកនាំផ្តាច់ការកំពុងខិតខំទប់ស្កាត់លំនឹងរបស់ខ្លួន រីឯប្រទេសអេហ្ស៊ីប និងទុយនេស៊ី មេដឹកនាំបានដួលរលំដោយកម្លាំងប្រជាពលរដ្ឋរួចទៅហើយ តើលោកមើលឃើញដំណើររបស់ពលរដ្ឋកម្ពុជារបៀបណាដែរ នៅពេលប្រទេសគ្មានលទ្ធិប្រជាធិបតេយ្យ ហើយលែងជាម្ចាស់ខ្លួនឯងទៅហើយនោះ ?

**សម រង្ស៊ី** : ខ្ញុំបានតាមដានយ៉ាងយកចិត្តទុកដាក់ចំពោះស្ថានការណ៍នៅប្រទេសអារ៉ាប់មួយចំនួននៅខាងជើងនៃទ្វីបអាហ្វ្រិក ក៏ដូចជានៅមជ្ឈិមបូព៌ា ហើយឃើញថាការទាមទារនៃប្រជាពលរដ្ឋទុយនេស៊ុី, អេហ្ស៊ីប, លីប៊ី, យេម៉ែន, ស៊ីរី, បារ៉ែន គឺគេទាមទារដូចអ្វីដែលពលរដ្ឋខ្មែរចង់បាន គឺស្ថានការណ៍នៃប្រទេសទាំងនោះមានដូចស្ថានការណ៍នៅកម្ពុជាដែរ ទី១- គឺភាពក្រីក្រតោកយ៉ាកធ្ងន់ធ្ងរច្រើនលើសលប់ ទី២- គឺភាពអយុត្តិធម៌ក្នុងសង្គម គឺអ្នកមានមួយក្តាប់តូចកាន់តែមានឡើង ឯអ្នកក្រកាន់តែក្រទៅ ទី៣- ជម្ងឺពុករលួយដល់ឆ្អឹង ទី៤- គឺការគាបសង្កត់បំភិតបំភ័យចាប់ដាក់គុក សម្លាប់មនុស្ស ទី៥- គឺការបោះឆ្នោតដោយលួចបន្លំដូចអូស្នីមូបារ៉ាក់ គឺបោះឆ្នោត៣០ឆ្នាំ គឺគាត់ឈ្នះឆ្នោតជានិច្ច គឺឈ្នះតាមរបៀបលួចបន្លំដូចគ្នានឹងនៅកម្ពុជា ទី៦- អ្នកដឹកនាំទាំងនោះចង់យកកូនខ្លួនមកជំនួស ដឹងថាខ្លួនមិនអាចធ្វើទៅមុខទៀតបានទៅអនាគត នៅអេហ្ស៊ីបក៏អ៊ីចឹង នៅលីប៊ីក៏អ៊ីចឹង នៅស្រុកខ្មែរ ហ៊ុន សែន ក៏អ៊ីចឹង នេះធ្វើឱ្យពលរដ្ឋគេធុញទ្រាន់ គេចង់ឃើញការផ្លាស់ប្តូរដែលប្រទេសកំពុងបង្ហាញការបះបោរនោះ មានលក្ខណៈដូចគ្នាជាច្រើនទៅនឹងកម្ពុជា ។





សមាជិកគណបក្ស សម រង្ស៊ី និងសហគមន៍ខ្មែរ ជួបនឹងលោក សម រង្ស៊ី នៅវត្តព្រះពុទ្ធរង្សី ហ្វីឡាដែលហ្វៀ

**ស្នរ** : ស្ថានភាពដែលបានកើតឡើងពេលនេះ គឺពលរដ្ឋនាំគ្នាងើបផុលឡើងដោយខ្លួនឯង ដោយគ្មានបក្សប្រឆាំង ឬក្រុមនិកាយសាសនាណាទេ រីឯនៅកម្ពុជាហាក់បីដូចជាត្រូវការណែនាំពីបក្សប្រឆាំងច្រើនជាងផុសចេញខ្លួនឯង តើលោកយល់យ៉ាងណាដែរ ?

**សម រង្ស៊ី** : ប្រជារាស្ត្រមានការឈឺចាប់ខ្លាំងដែលគេហៅថា "ដល់កហើយ" នោះ គេធ្វើការតវ៉ាទាមទារដោយសារមានការឈឺចាប់ដល់កំរិតមួយ ដែលគេអាចទទួលយកបាន ហើយឥឡូវនេះ គេមានបច្ចេកវិជ្ជាមួយស្រួលទាក់ទងគ្នាតាម Face book តាម Twitter តាមទូរស័ព្ទដៃដែលមានគ្រប់គ្នាហ្នឹង ម្យ៉ាងវិញទៀតគេឃើញមានយុវជនជាច្រើន ដែលភាគច្រើនឥតការងារធ្វើ តែមានងាមពលខ្លាំងមានចំណេះស្រឡាញ់យុត្តិធម៌ ប្រើបច្ចេកវិជ្ជាថ្មីសម្រាប់ទាក់ទងគ្នាបង្កើតបាននូវអ្វីដែលនឹកស្មានមិនដល់នៅប្រទេសខ្មែរ រឿងដែលធ្ងន់ធ្ងរ គឺរឿងដីធ្លី នៅប្រទេសដែលខ្ញុំនិយាយអម្បាញ់មិញពុំមានរឿងដីធ្លីធ្ងន់ធ្ងរដូចកម្ពុជាទេ គឺគេលួចប្លន់នៅកម្ពុជា គេយកដីពីពលរដ្ឋនៃប្រទេសកសិកម្ម គឺវាអាចនាំមកនូវព្រឹត្តិការណ៍បះបោរ យើងនៅចាំនៅឡើយពីព្រឹត្តិការណ៍បះបោរនៅកម្ពុជាឆ្នាំ១៩៦៧ គឺចលនាខ្មែរក្រហមនៅសំឡូត នាំគ្នាបះបោរដោយសារតែការយកដីធ្លី ពីអ្នកស្រុកតែមួយទេ តែការឈឺចាប់របស់ពលរដ្ឋនាសម័យនេះ គឺនៅគ្រប់ខេត្ត នៅទីប្រជុំជនក៏មាន នៅភ្នំពេញនៅបឹងកក់ គឺលក្ខណៈហ្នឹងហើយដែលនឹងធ្វើឱ្យពលរដ្ឋបះបោរទូទាំងប្រទេស ។

**ស្នរ** : ប្រជាជាតិខ្មែរនៅពុំទាន់ "ដល់ក" ហើយក្រោកស្រុសគ្នាទូទាំងប្រទេសនៅឡើយហេតុអ្វី ?

**សម រង្ស៊ី** : ម្សិលមិញនេះ ខ្ញុំបានជួបនឹងប្រជាពលរដ្ឋតាមវីដេអូកុងហ្វ្រង់ ប្រជាពលរដ្ឋនិយាយថា ការយកដីនេះ ដូចជាសម្លាប់រាស្ត្រអ៊ីចឹង គ្នាមានតែដីទេ បើអស់ដីច្បាស់ជាអស់ជីវិត ដូច្នេះបើមុខតែស្លាប់ គាត់នឹងមិននៅស្ងៀមទុកឱ្យគេសម្លាប់នោះទេ បើសិនឱ្យក្រុមហ៊ុនធ្វើសម្បទាន៩៩ឆ្នាំ ចូលមកយកដី គឺឥតឱ្យចូលមកយកបានទេ បង្ហាញកំហឹងចង់មកចាប់ឥតឱ្យចាប់ទៀត ឥឡូវវាដល់ហើយ នៅសល់តែទំនាក់ទំនងពីខេត្តមួយទៅខេត្តមួយទៀត ប៉ុន្តែបច្ចេកទេសទំនើបកំពុងតែបំពេញលក្ខខណ្ឌនោះ ហើយប្រជាពលរដ្ឋនឹងរើបំរះបះបោះប្តូររបបនៅស្រុកខ្មែរ ។

**ស្នរ** : មានប្រទេសពីរ ដែលហាក់ដូចជាពេញចិត្តឃើញរដ្ឋាភិបាលខ្មែរ មាននយោបាយរបៀបសព្វថ្ងៃនេះ គឺប្រទេសចិន និងប្រទេសវៀតណាមតាមយោបល់របស់លោក តើប្រទេសទាំងពីនោះអាចជួយបង្រ្កាបពលរដ្ឋខ្មែរ របៀបនេះជារហូតទៅឬយ៉ាងណា ?

**សម រង្ស៊ី** : ដូចជាចិន អ្នកវិនិយោគខ្លះគេដឹងថាគេខំបណ្តាក់ទុកនៅស្រុកខ្មែរ គេចង់រកស៊ី គេចង់បានសុខតែបើគ្មានស្ថេរភាពទេ គឺមិនមែនគេទៅចូលដៃលោក ហ៊ុន សែន ឱ្យជាន់កប្រជារាស្ត្រតទៅទៀតទេ ច្បាស់ជាគេមានកង្វល់ ទោះជាគេមិននិយាយក៏ដោយ ។

**ស្នរ** : ខ្ញុំនៅពុំទាន់ឃើញថា មានសញ្ញាណាមួយដែលថាប្រទេសទាំងពីរនោះ បន្ថយដៃគាំទ្រលោក ហ៊ុន សែន សោះ ឬក៏លោកឃើញខុសពីខ្ញុំ ដោយសារលោកធ្វើការនេះផ្ទាល់ដៃ ?

**សម រង្ស៊ី** : ខ្ញុំទើបបានទៅប្រទេសចិន ហើយនិយាយជាមួយអ្នករកទទួលទាននៅស្រុកខ្មែរមួយចំនួន គេមិនចង់ឱ្យប្រទេសខ្មែរ មានភាពចលាចលនោះទេ គេចង់ឱ្យប្រជាពលរដ្ឋមានការគាំទ្រលើការដឹកនាំខ្ញុំប្រទេស គេឃើញរបៀបដឹកនាំសព្វថ្ងៃធ្វើឱ្យប្រជាពលរដ្ឋមានការឈឺចាប់ ខ្ញុំជឿថា គេមិនចង់ឃើញប្រទេសយើងដឹកនាំនយោបាយរបៀបហ្នឹងតទៅទៀតទេ ។

**ស្នរ** : គណបក្ស សម រង្ស៊ី នៅតែជាគណបក្សប្រឆាំងដ៏សំខាន់មួយនៅកម្ពុជា តើកំណើននៃគណបក្សលោកប្រែប្រួលដល់ណាហើយ ? តើលោកបានលទ្ធផលនៃការស្ទង់មតិចុងក្រោយយ៉ាងណាដែរ ?

**សម រង្ស៊ី** : ជំហររបស់គណបក្ស សម រង្ស៊ី ជំហររបស់ខ្លួនខ្ញុំផ្ទាល់ គឺការពារផលប្រយោជន៍របស់ប្រជាពលរដ្ឋខ្មែរ ការពារផលប្រយោជន៍ជាតិ ចាប់តាំងពីខ្ញុំចូលក្នុងឆាកនយោបាយ២០ឆ្នាំហើយ ខ្ញុំយល់ឃើញថា ទី១- បញ្ហាយួនឈ្លានពានលើកម្ពុជា ទី២- បញ្ហារដ្ឋអំណាចផ្តាច់ការ ទី៣- អំពើពុករលួយដែលបណ្តាលឱ្យរាស្ត្រក្រីក្រ ទី៤- ការជិះជាន់បំបាត់សិទ្ធិសេរីភាព ចាប់ចង សម្លាប់ មកដល់សព្វថ្ងៃនេះ គ្មានអ្វីផ្លាស់ប្តូរទេ យួនឈ្លានពានលើសេដ្ឋកិច្ច ដីសម្បទាន ទ្រព្យសម្បត្តិ សេដ្ឋកិច្ចមានសិទ្ធិផ្តាច់មុខយកច្រើនណាស់ អំណាចកុម្មុយនីស្តផ្តាច់ការរ បៀបកុម្មុយនីស្ត អំពើពុករលួយមានកាន់តែធ្ងន់ធ្ងរ យើងមិនបាច់គិតអ្វីទៀតទេ ជំហររបស់យើងនៅតែមានដដែល ។ ហើយបើយើងមើលទៅអ្នកគាំទ្រ អ្នកបោះឆ្នោតឱ្យយើង បើយោងតាមរូបភាពលួចសន្លឹកឆ្នោតមិនសមថា បានចំនួនគាំទ្រកាន់តែច្រើនរបៀបនេះទេ ហើយគ្រាន់តែសន្លឹកឆ្នោតបាតហិបសោះ ឃើញថាចំនួនគាំទ្ររាប់ពាន់នាក់ពីការបោះឆ្នោតមួយទៅការបោះឆ្នោតមួយទៀត សម្លេងយើងឡើងជានិច្ច ដូច្នេះការគាំទ្រនេះបញ្ជាក់ថា យើងធ្វើត្រូវ ហើយតំណាងជាប់ឆ្នោតមានចំនួនឡើងជានិច្ចដែរ ។

**ស្នរ** : សម្លេងគាំទ្របានកើនឡើង តើលោកមានគំនិតថា ចូលរួមជាមួយអ្នកប្រឆាំងឯទៀតៗ ដើម្បីប្តូរអំណាចពីដៃអ្នកដដែលនោះឱ្យបានឆាប់ឬទេ ?

**សម រង្ស៊ី** : ស៊ីសងជំហរ បើមានជំហរដូចគ្នា ហើយមានភាពស្មោះត្រង់ យើងនឹងរួមអ្នកប្រជាធិបតេយ្យទាំងអស់ មិនមែននិយាយតែមាត់ ហើយសរសេរលើក្រដាសនោះទេ គឺជំហរជាក់ស្តែងប្រវត្តិរបស់មនុស្សគួរទុកចិត្តបានយូរអង្វែងទេ ។

**ស្នរ** : ពីថ្ងៃនេះទៅដល់ថ្ងៃបោះឆ្នោត តើមានសង្ឃឹមថា នឹងមានការចងសម្ព័ន្ធរវាងគណបក្ស សម រង្ស៊ី និងគណបក្សផ្សេងណាមួយដើម្បីឈ្នះទេ?

**សម រង្ស៊ី** : ឥតមានចង្កៀតចង្អល់អីទេ យើងអាចរួមគណបក្សទាំងអស់ ដោយឈរលើភាពជំហរជាក់ស្តែង និងភាពស្មោះត្រង់គ្នាពិតប្រាកដ ។

**ស្នរ** : លោកថាចប់ពីហ្វីឡាដែលហ្វៀ រួចបន្តដំណើរទៅរដ្ឋធានីវ៉ាស៊ីនតុនភ្លាម តើលោកនៅមានការអ្វីសំខាន់ទៀតនៅទីនោះ ?

**សម រង្ស៊ី** : ខ្ញុំត្រូវទៅជួបនឹងមេធាវីរបស់ខ្ញុំ ដើម្បីបន្តបណ្តឹងចំពោះ ហ៊ុន សែន ពីបទធ្វើមនុស្សឃាដឃាដកម្មសង្គ្រាម ពាក់ព័ន្ធនឹងការដែលគាត់កែនមនុស្សនាំមនុស្សយកទៅសម្លាប់ជាច្រើនម៉ឺននាក់ ។

**ស្នរ** : តើលោកអាចធ្វើទៅបានដែរឬទេ ពីសហរដ្ឋអាមេរិកនេះទៅ ?

**សម រង្ស៊ី** : អាចធ្វើបាន ដោយនៅទីនោះមានមេធាវីពូកែៗ ជាច្រើន ហើយមានច្បាប់អនុញ្ញាតឱ្យប្តឹងចំពោះជនឧក្រិដ្ឋ ដែលរស់នៅទីណាក៏ដោយ មានអំណាចប៉ុណ្ណាក៏ដោយ ទៅលើបទឧក្រិដ្ឋដែលកើតឡើងក្នុងរយៈពេលយូរប៉ុណ្ណាក៏ដោយនៅទីណាក៏ដោយ មានសញ្ជាតិណាក៏ដោយ បន្ទាប់ពីនេះខ្ញុំនឹងទៅដាក់ពាក្យបណ្តឹងទៅបណ្តាប្រទេសនៅអឺរ៉ុបមួយចំនួនទៀត ។

**ស្នរ** : ចំពោះករណីដដែល ឬមានអ្វីផ្សេងទៀត?

**សម រង្ស៊ី** : រឿងដដែល និងរឿងផ្សេងទៀតជាច្រើន ដូចជាចូលនៃជាមួយប្រពន្ធគាត់ ប៊ុនរ៉ានី ក្នុងករណីសម្លាប់ ពិសិដ្ឋ ពិលិកា ដែលមានសេចក្តីរាយការណ៍ពីស ប៊ុនហ៊ាង ជាអ្នកសម្លាប់... ឥតហ៊ានប្តឹងពីអ្នកកាសែតដែលនិយាយខ្វះខ្វារនោះទេ... ហោ ណាំហុង នៅគ្រាន់បើហ៊ានប្តឹងខ្ញុំ តែប្តឹងចាញ់ ! បើ ហ៊ុន សែន ហ៊ានធ្វើដូចគ្នារឹតតែចាញ់ខ្លាំងទៅទៀត... មានខ្វះអីករណីដូចគ្នានេះ ប្រធានាធិបតី ពីណូសេ ក៏ត្រូវគេចាប់ខ្លួននៅបរទេសដែរ ។

**ស្នរ** : សុំអរគុណលោក សម រង្ស៊ី ! ៕

# សន្និសីទឆ្នាំទី3នៃយុវជនសហព័ន្ធខ្មែរកម្ពុជាក្រោម

**ហ្វីឡាដែលហ្វៀ :** យុវជនខ្មែរកម្ពុជាក្រោម បានបើកសន្និសីទប្រចាំឆ្នាំជាលើកទី៣របស់ខ្លួន កាលពីថ្ងៃទី២១ ខែឧសភា ឆ្នាំ២០១១ នៅអគារប្រជុំដ៏ធំមួយនៃមជ្ឈមណ្ឌលធម្មនុញ្ញជាតិ National Constition Center ។ វាគ្មិនសំខាន់ៗជាច្រើនបានឡើងមកសំដែងការចាប់អារម្មណ៍ ក្នុងគោលដៅពង្រឹងចលនាខ្មែរកម្ពុជាក្រោម ដែលជាជនភាគតិចម្ចាស់ស្រុកស្របច្បាប់នៅប្រទេសវៀតណាមបច្ចុប្បន្ន ។

លោក ថាច់ ង៉ុកថាច់ ប្រធានសហព័ន្ធបាននិយាយថា ចលនាយុវជនខ្មែរក្រោមនេះ ជាសាខាក្នុងក្រមខណ្ឌសហព័ន្ធ គឺជាទំពាំងស្នងឫស្សី ដែលកំពុងធ្វើការមានប្រសិទ្ធភាព ។ សាខាឯទៀតៗមានផ្នែកស្ត្រីខ្មែរក្រោមផ្នែកកីឡា ផ្នែកសាសនា ។ល។ ទាំងអស់គ្នាផ្តោតអារម្មណ៍ប្រមូលយុវជនក្នុងសាកលលោកឱ្យអាចមកជួបជុំគ្នាយ៉ាងហោចណាស់១ឆ្នាំម្តង មកពីញូវហ្សេឡិន ពីកាណាដា ពីយូរ៉ុប ពីកម្ពុជា...។ លោកថាច់ បានបន្តថា ឆ្នាំកន្លងទៅសហព័ន្ធបានបញ្ជូនយុវជន យុវនារីឱ្យទៅសិក្សានៅកម្ពុជា ឬថៃ មានបញ្ជូនសមណនិស្សិតឱ្យមករៀននៅអាមេរិក ឬទៅឥណ្ឌា ពីព្រោះយើងត្រូវការឱ្យមានមនុស្សអ្នកចេះឱ្យបានច្រើន ដូច្នេះយុវជនមានប្រសិទ្ធភាពច្រើនជាងមនុស្សចាស់ ។ លោក ថាច់ ង៉ុកថាច់ មានមោទនភាពដោយឃើញយុវជនសហព័ន្ធកំពុងងើបឈរស្រោងឡើងនាពេលនេះ ដូចជា វិតី ត្រាន់ ជាសហប្រធានចលនាយុវជនអាស៊ាន គេនឹងឡើងថ្លែងសន្ទរកថាជាមួយយុវជនខ្មែរពីររូបទៀតនៅអង្គការសហប្រជាជាតិ គឺនាង ត្រាង គីម មកពីញូវហ្សេឡិន និងនាង ទៀង មកពីកាណាដា ។

ខួប១០ឆ្នាំនៃការទទួលសិទ្ធិជាម្ចាស់ស្រុករបស់សហព័ន្ធខ្មែរកម្ពុជាក្រោម អង្គការសហប្រជាជាតិគេមានសំនួរបី ១- រដ្ឋាភិបាលវៀតណាមបានកែប្រែអ្វីខ្លះហើយ ? ជម្រុញច្បាប់រដ្ឋ និងសិទ្ធិជនភាគតិច ដើម្បីឱ្យមានការទទួលស្គាល់ ដោយចុះហត្ថលេខាជាច្បាប់ ៣- ធ្វើវេទិកាជនជាតិដើមឱ្យទៅជាវេទិកាជនជាតិដើមពិតប្រាកដ ៕ *ខ្មែរប៉ុស្តិ៍*







លោកថាច់ ង៉ុកថាច់ (រូបឆ្វេង)



ទិដ្ឋភាពសន្និសីទរៀបចំដោយយុវជនខ្មែរកម្ពុជាក្រោម នៅហ្វីឡាដែលហ្វៀ



# ជំរះក្តីនៅវត្តព្រះពុទ្ធប្រទានពរ

**ហ្វីឡាដែលហ្វៀ :** ឧបាសកជើងវត្តព្រះពុទ្ធប្រទានពរ ប្រមាណ៩០នាក់ បានជួបជុំគ្នានៅសាលជំរះក្តីនៃតុលាការក្រុងហ្វីឡាដែលហ្វៀ ដើម្បីជំរះបញ្ចប់បណ្តឹងរវាងគណកម្មការវត្តជាមួយនឹងអតីតចៅអធិការវត្តដដែលនេះ ដោយគណកម្មាធិការ បានប្តឹងចៅអធិការព្រះនាម ស៊ុមសាក់ សូវ៉ានរ៉ាត ឱ្យចេញពីវត្ត ប៉ុន្តែអនិ្នត ស៊ុមសាក់ មិនព្រមចាកចេញ ដោយយល់ថាខ្លួនជាម្ចាស់នៃវត្តនោះនៅឡើយ កាលពីថ្ងៃទី២៤ ខែឧសភា ឆ្នាំ២០១១ ។

វត្តឱ្យមកឆ្លើយបំភ្លឺនៅតុលាការ សួរចម្លើយដោយមេធាវីទាំងពីរខាង ។ ការពារនូវទស្សនៈរបស់ខ្លួន អនិ្នត ស៊ុម សាក់ និយាយថា "ផ្ទះសម្រាប់ធ្វើវត្តនោះមានឈ្មោះជាសហគ្រាស (CORPORATION) មែន គឺឈ្មោះវត្តព្រះពុទ្ធប្រទានពរ ដោយលោកបានដាក់ឈ្មោះនេះដោយខ្លួនឯង ហើយមានម្ចាស់តែម្នាក់គឺខ្លួនលោក" លោកបន្តថា "លោកជាអ្នកដាក់ប្រាក់សម្រាប់ទិញផ្ទះនោះផ្តាច់តែម្តង" លោកថា លោកជាអ្នកចេញប្រាក់ បើទោះជាមានសមាជិកក្រុមប្រឹក្សាដែរ" ព្រះអង្គបានបន្តថា "នរណាដែលមិនមែនជាព្រះសង្ឃ ពុំអាចមាននាទីជាចៅអធិការបានទេ ហើយក៏បានអាចក្លាយជាប្រធានវត្តបានដែរ គ្រហស្ថម្នាក់ដែលមានបន្ទប់មួយរស់នៅក្នុងវត្ត គឺជាការប្រព្រឹត្តខុសនឹងលក្ខន្តិករបស់វត្ត ដែលគណកម្មាធិការសុំឱ្យលោក ស៊ុមសាក់ ចាកចេញពីវត្ត"។ រីឯលោក ត្រែហ៊ិល ដែលជាអនុប្រធានវត្ត ទទួលបន្ទុកខាងកិច្ចការគ្រហស្ថ និងចំណូលចំណាយរបស់វត្ត បានឆ្លើយនឹងសំនួរយ៉ាងនេះថា "នៅពេលគណកម្មាធិការបោះឆ្នោតឱ្យខ្ញុំធ្វើជាអនុប្រធានភ្លាម កាលពី២ឆ្នាំមុន ខ្ញុំបានអញ្ជើញឱ្យគណកម្មាធិការធ្វើសេចក្តីសម្រេចឱ្យលោក ស៊ុមសាក់ ចេញពីវត្ត ដើម្បីទុកកន្លែង

ព្រះសង្ឃ និងគ្រហស្ថវត្តព្រះពុទ្ធប្រទានពរនៅសាលាក្តី ហ្វីឡាដែលហ្វៀ

ចៅអធិការ ស៊ុមសាក់ ចាកសិក្ខាបទនៅចំពោះមុខឧបជ្ឈាយ៍

ទំនាស់នេះបានផ្តើមឡើងពី៦ឆ្នាំមុន នៅពេលដែលចៅអធិការវត្តព្រះពុទ្ធប្រទានពរ ព្រះនាម ស៊ុម សាក់ ស្ថិតនៅ 1732 ផ្លូវមីហ្វលីន ហ្វីឡាដែលហ្វៀខាងត្បូង បានលាចាកសិក្ខាបទនៅចំពោះមុខព្រះសង្ឃ ដែលក្នុងចំណោមនោះ ព្រះតេជគុណ សុទ្ធ សារិម ជាឧបជ្ឈាយ៍ ដែលបានទទួលការតែងតាំងជាចៅអធិការវត្តជាបន្តទៅទៀតនោះ ។ អធិការនោះកើតឡើងដោយអនិ្នត ស៊ុម សាក់ មិនទទួលស្គាល់គណកម្មាធិការថ្មី ដឹកនាំដោយព្រះតេជគុណ សារិម សុទ្ធ ហើយទាមទារថាវត្តនោះជាកម្មសិទ្ធរបស់ខ្លួន ហើយក៏កាន់កាប់បន្ទប់សំខាន់មួយរបស់វត្ត តាំងពីពេលនោះមក ។

ថ្ងៃសវនាការនៅចំពោះមុខចៅក្រម បានអញ្ជើញអនិ្នត ស៊ុម សាក់, ព្រះតេជគុណ សារិម សុទ្ធ, លោក ត្រែហ៊ិល អនុប្រធានវត្ត, លោក សួន សុផល អាចារ្យភិបាល៤នាក់ទៀតក៏ដោយ ។ នៅចំពោះមុខចៅក្រម លោក ស៊ុម សាក់ ពន្យល់ថា "រូបថតដែលបង្ហាញពីពិធីលាសិក្ខាបទ គឺគ្រាន់តែលោកមិនចង់ស្លៀកស្បង់តទៅទៀតប៉ុណ្ណោះ ហើយស្លៀកសំលៀកបំពាក់គ្រហស្ថវិញម្តង... តែឥតបានលាចេញតំណែងជាព្រះសង្ឃជាចៅ អធិការ និងជាប្រធានវត្តម្តងណាទេ ដូច្នេះ គឺអ្នកទាំងឡាយដែលមករស់នៅក្នុងផ្ទះនោះ គឺមកលួចនៅដោយខុសច្បាប់" ។ ចំណែកឯព្រះតេជគុណ សារិម ដែលបានឆ្លើយនឹងសំនួរថា "ព្រះអង្គជាឧបជ្ឈាយ៍នៃពិធីដោះស្បង់ចីវរលោក ស៊ុមសាក់ ដែលពិធីនោះកោះអញ្ជើញដោយលោក ស៊ុមសាក់ ខ្លួនឯង ព្រះអង្គបានត្រូវទទួលការតែងតាំងដោយគណកម្មាធិការនៅថ្ងៃដដែលឱ្យឡើងជាចៅអធិការបន្តទៅទៀត ហើយក៏ទទួលការតែងតាំងជាស្វ័យប្រវត្តិឱ្យទៅជាប្រធានគណកម្មាធិការវត្តជាមួយគ្នាប្រគេនលោកសង្ឃឯទៀតៗ ហើយខ្ញុំជាអ្នកយកលិខិតនោះទៅឱ្យលោក ស៊ុមសាក់ ដោយផ្ទាល់ដៃ ខ្ញុំពុំដាក់ភាគហ៊ុនអ្វីនៅក្នុងវត្តនេះទេ ខ្ញុំមានតែធ្វើអំណោយកសាងវត្តតែប៉ុណ្ណោះ"។ ចំណែកឯលោក សួន សុផល វិញ បាននិយាយប្រាប់ចៅក្រមថា "លោកជាអាចារ្យវត្ត ហើយជាអ្នកចូលរួមសកម្មភាពតាំងពីផ្តើមទិញវត្តព្រះពុទ្ធប្រទានពរមកម្លេះ រហូតមកដល់សព្វថ្ងៃនេះ"។

កិច្ចប្រជុំសវនាការរបស់តុលាការ ផ្តើមឡើងនៅម៉ោង១០ព្រឹក ហើយបានបញ្ចប់សព្វគ្រប់នៅម៉ោង៤រសៀល ដោយចៅក្រមសន្យាថានឹងផ្តល់សេចក្តីសម្រេចជាលាយលក្ខណ៍អក្សរផ្ញើទៅអស័យដ្ឋានរៀងៗខ្លួន ៕

(ខ្មែរប៉ុស្តិ៍)

KhmerPost USA, LLC
East Coast Publication

**Pin Samkhon,**
*Publisher & Editor-in-Chief*
Email: pinsamkhon@gmail.com
*Staff Writers:* **Loeum Im, Audria Chea, Sovan Heng**

*Contributed Writers:*
**Mam Yin, Kim Phien, Lanica Angpak, & Dannely Sam**
KhmerPostLowell@gmail.com

**Soben Pin**
*Marketing Director*
KhmerPostUSA@gmail.com
**267-253-3947**
**Sam Khoeun**
*Sales Consultant*
**(781) 244-0522**

*Design Staffs:*
**Leang Heng & Doch Vuthy**

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Pennsylvanian & Massachusett.

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year. Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

## តមកពីទំព័រទី ០១ សម្ភាសន៍ជាមួយលោក សម រង្ស៊ី ...


លោក យឹម សុវណ្ណ


លោក ជាម យៀប

ក្នុងកិច្ចសន្ទនានោះ កាសែតដើមអម្ពិល ដែលមាននិន្នាការទោរទៅខាងលោក ហ៊ុន សែន ចង់បង្ហាញថា មានការសម្ងាត់ត្រូវបានកាសែតរកឃើញថា "គណបក្សសិទ្ធិមនុស្ស ជាគណបក្សដែលលោក ហ៊ុន សែន បានបង្កើតឡើងដើម្បីរំលាយបក្ស សម រង្ស៊ី" ។ អ្នកកាសែតក្នុងស្រុកម្នាក់បានពិពណ៌នាការសន្ទនាថា "លោក ហ៊ុន សែន បានសសើរដល់ការជោគជ័យនៃការបង្កើតគណបក្សសិទ្ធិមនុស្ស តាមរយៈការឧបត្ថម្ភប្រាក់ ហើយព្រមព្រៀងផ្តល់ពហុកីឡាដ្ឋានជាតិអូឡាំពិក ឱ្យធ្វើសមាជ និងបានផ្តល់គំនិតមួយចំនួនទៀតដល់លោក កឹម សុខា ឱ្យអនុវត្តន៍ ដូចជា ត្រូវយកមនុស្សពីគណបក្ស សម រង្ស៊ី មកធ្វើការជាមួយ"។

ឆ្លើយតបនឹងកាសែតដដែលនោះ លោក កឹម សុខា កាលពីថ្ងៃទី២៩នោះ និយាយទទួលស្គាល់ថា មានការសន្ទនាជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន មែន តែលោកពុំមែនជាអាយ៉ងរបស់លោក ហ៊ុន សែន នោះទេ លោកបានបន្តថា "ដោយសារលោកមានបំណងបង្កើតគណបក្សសិទ្ធិមនុស្ស ដើម្បីឈានទៅដល់ការបើកសមាជធំមួយ ដែលមានគ្នា ២លានពាម៉ឺននាក់ចូលរួម ប៉ុន្តែលោកមិនបានសន្យាថា បំរើគណបក្សប្រជាជននោះឡើយ"។ លោកបានបន្តថា "ជាធម្មតាគណបក្សប្រជាជន គេបញ្ចេញសកម្មភាពបៀបនេះ រៀងរាល់មុនពេលបោះឆ្នោតដើម្បីវាយប្រហារអ្នកណាដែលមានកម្លាំងប្រឆាំងនឹងគេ... គេបានតម្រុយខ្លះជាមុនហើយ" ។

មន្ត្រីខាងគណបក្សប្រជាជនលោក ជាម យៀប ប្រកាសថា គណបក្សប្រជាជនគ្មានអ្វីទាក់ទងនឹងគណបក្សសិទ្ធិមនុស្សនោះទេ ហើយមន្ត្រីគណបក្ស ហើយមន្ត្រីគណបក្ស សម រង្ស៊ី គឺលោក យឹម សុវណ្ណ និយាយថា "អ្នកនយោបាយនៅប្រទេសកម្ពុជា មានភាពមិនស្មោះត្រង់ ភាគច្រើនជាអាយ៉ងរបស់គណបក្សកាន់អំណាច"។

ការបង្ហាញខ្សែអាត់ស្តីពីកិច្ចសន្ទនានោះ នឹងប៉ះពាល់យ៉ាងដំណំដល់កិច្ចប្រឹងប្រែងធ្វើសម្ព័ន្ធភាពរវាងគណបក្សប្រឆាំងសេរីនៅកម្ពុជា របស់លោក កឹម សុខា ។ លោក សម រង្ស៊ី បានរំលឹកជាមួយខ្មែរប៉ុស្តិ៍ នូវលក្ខខណ្ឌនៃការចូលរួមប្រកួតប្រជែងប្រឆាំងនឹងគណបក្សប្រជាជននៅលើចំណុច "ភាពស្មោះត្រង់" នោះឯង ៕ *(ខ្មែរប៉ុស្តិ៍)*

# អាជ្ញាធរផ្តល់ទីជម្រកទីក្រុងឡូវែល

## របៀបដាក់ពាក្យសុំសំរាប់គម្រោង សិកសិន 8 តាមអ៊ីនធឺណែត

១. ចូលទៅ www.lhma.org
សារស្វាគមន៍ពីអាជ្ញាធរផ្តល់ទីជម្រក
ទីក្រុងឡូវែលនឹងបង្ហាញឡើង“Welcome
to the Lowell Housing Authority!”

២. រំកិលចុះក្រោមទៅកាន់ផ្នែកខាងក្រោមនៃទំព័រ និង ចុច នៅលើ “Section 8 Project Based Application” ទំព័រថ្មីនឹង បើកឡើង។

៣.រំកិលចុះក្រោមទៅកាន់ផ្នែកខាងក្រោមនៃទំព័រ ហើយ ចុចនៅលើ “Section 8 Project Based Application”

៤.បញ្ចូលលេខសន្តិសុខសង្គមរបស់អ្នក២ដង ហើយចុច នៅលើបន្ទះ “Continue”ដើម្បីទៅកាន់ទម្រង់បែបបទ ពាក្យសុំ “HOUSING PRE-APPLICATION”

___-___-____

___-___-____

Continue

៥.សូមធ្វើតាមសេចក្តីណែនាំ និងបំពេញពាក្យសុំឱ្យពេញលេញ។ នៅពេលចប់ សូមចុចនៅលើបន្ទះ “Complete Application”

Continue Application

៦.ត្រូវប្រាកដបោះពុម្ពបង្កាន់ដៃពាក្យសុំរបស់អ្នកសំរាប់កំណត់ ត្រារបស់អ្នក

### សេចក្តីជូនដំណឹងសំខាន់

បញ្ជីរង់ចាំរបស់កម្មវិធីផ្អែកតាមគម្រោងសិកសិន 8 (S8PB) គឺបើកចំហរសំរាប់រយៈពេលមួយសប្តាហ៍តែប៉ុណ្ណោះ ដែលចាប់ផ្តើម ពីថ្ងៃទី ៦ ខែ មិថុនា ឆ្នាំ ២០១១ នៅវេលាម៉ោង ៨:៣០ ព្រឹក រហូតដល់ថ្ងៃទី ១០ ខែ មិថុនា ឆ្នាំ ២០១១ បញ្ចប់នៅម៉ោង ៤:៣០ រសៀល











# ឌឹ ខែមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខែមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៣ ខែឧសភា ឆ្នាំ២០១១


## China Gives Uniforms to Cambodian Military

By Phorn Bopha
THE CAMBODIA DAILY

The Chinese government fulfilled part of a promise to provide $14.7 million in military aid to Cambodia yesterday when it presented 50,000 military uniforms in a ceremony at the Pochentong airbase in Phnom Penh, an official said.

The aid comes after meetings in April last year between Prime Minister Hun Sen and Chinese President Hun Jintao in which China promised the 50,000 uniforms as part of a $14.7 million aid package. As part of the package, China also committed to providing 257 military vehicles to Cambodia in an apparent response to the US canceling the delivery of 200 vehicles to Cambodia over the expulsion of 20 Uighur asylum seekers back to China in 2009.

"This is the result of good military cooperation between Cambodia and China," said Lieutenant General Chhum Sucheat, spokesman for the Ministry of Defense. "They gave us 50,000 shirts, pants, belts, shoes and hats. All of it will be sent to the military."

Yang Tian Yve, a spokesman with the Chinese Embassy said that the giving of military uniforms was a benefit to both countries.

"These uniforms will strengthen ties between Cambodia and China," he said, adding that he was confident of bolstered diplomatic cooperation between the two countries in the future.

SRP spokesman Yim Sovann welcomed the Chinese military aid but warned that it must come without the government making political concessions.

"I am glad if the aid came from a pure mind, and I hope that it will get to the military's hands," Mr Sovann said. "I hope it does not come attached to issues that could be considered a rights abuse, or might harm Cambodia."

In a similar ceremony at the Ministry of Defense last June, China delivered 20 military ambulances, 30 jeeps and 207 trucks, for a total of 257 military vehicles to Cambodia as a part of the same deal.

"We received [the] aid from China without any conditions," said Foreign Affairs Minister Hor Namhong, following the June ceremony. "It does not influence anything."

## ចិនផ្តល់ឯកសណ្ឋាន៥ម៉ឺនសម្រាប់ដល់យោធាកម្ពុជា

ដោយ : ផន បុប្ផា
THE CAMBODIA DAILY

មន្ត្រីម្នាក់បាននិយាយថា រដ្ឋាភិបាលចិនបានបំពេញតាមការសន្យាមួយផ្នែកក្នុងការផ្តល់ជំនួយយោធាដែលមានតម្លៃ ១៤,៧លានដុល្លារដល់កម្ពុជា កាលពីម្សិលមិញនៅពេលខ្លួនប្រគល់ឯកសណ្ឋានយោធាចំនួន៥០.០០០សម្រាប់នៅក្នុងពិធីមួយនៅឯមូលដ្ឋានទ័ពអាកាសពោធិ៍ចិនតុងក្នុងក្រុងភ្នំពេញ ។

ជំនួសនេះកើតមានក្រោយពីជំនួបកាលពីខែមេសាឆ្នាំមុនរវាងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងប្រធានាធិបតីចិន គឺលោក ហ៊ូ ជិនតាវ ដែលនៅក្នុងនោះ ចិនបានសន្យាផ្តល់នូវឯកសណ្ឋានចំនួន៥០.០០០សម្រាប់ជាផ្នែកនៃកញ្ចប់ជំនួយដែលមានទឹកប្រាក់ចំនួន១៤,៧លានដុល្លារ ។ ជាផ្នែកនៃកញ្ចប់ជំនួយនេះ ចិនបានសន្យាផ្តល់រថយន្តយោធាចំនួន២៥៧គ្រឿងដល់កម្ពុជាផងដែរ ជាការឆ្លើយតបទៅនឹងសហរដ្ឋអាមេរិក ដែលបានលុបចោលការបញ្ជូនរថយន្តចំនួន២០០គ្រឿងមកកម្ពុជា ដោយសារមានការបណ្តេញអ្នកស្វែងរកសិទ្ធិជ្រកកោនជនជាតិវីហ្គួចំនួន ២០នាក់ឱ្យត្រឡប់ទៅប្រទេសចិនវិញកាលពីឆ្នាំ២០០៩ ។

លោកឧត្តមសេនីយ៍ឯក ឈុំ សុជាតិ អ្នកនាំ ពាក្យក្រសួងការពារជាតិបានមានប្រសាសន៍ថា "នេះគឺជាលទ្ធផលនៃកិច្ចសហប្រតិបត្តិការល្អផ្នែកយោធារវាងកម្ពុជា និងចិន ។ គេឱ្យឃើញនូវខោ អាវ ខ្សែក្រវ៉ាត់ ស្បែកជើង និងមួកចំនួន៥០.០០០សម្រាប់ ។ ទាំងអស់នេះនឹងត្រូវបញ្ជូនទៅឱ្យយោធា" ។

លោក យ៉ាង ធានអ៊ីវ ជាអ្នកនាំពាក្យស្ថានទូតចិនបានមានប្រសាសន៍ថា ការផ្តល់ជំនួយឯកសណ្ឋានយោធានេះ គឺជាផលប្រយោជន៍របស់ប្រទេសទាំងពីរ ។

លោកបានមានប្រសាសន៍ថា "ឯកសណ្ឋានទាំងនេះនឹងជួយទំនាក់ទំនងរវាងកម្ពុជានិងចិន ។ លោកបានបន្ថែមថា លោកមានជំនឿថា នឹងមានកិច្ចសហប្រតិបត្តិការផ្នែកការទូតកាន់តែល្អប្រសើររវាងប្រទេសទាំងពីរនៅពេលអនាគត ។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្ស សម រង្ស៊ី បានស្វាគមន៍ជំនួយផ្នែកយោធារបស់ចិននេះ ប៉ុន្តែបានក្រើនរំលឹកថា ជំនួយនេះត្រូវតែទទួលបាន ដោយមិនមានការធ្វើសម្បទានផ្នែកនយោបាយពីរដ្ឋាភិបាល ។

លោក យឹម សុវណ្ណ បានមានប្រសាសន៍ថា "ខ្ញុំរីករាយ បើសិនជាជំនួយនេះកើតចេញពីទឹកចិត្តបរិសុទ្ធ ហើយខ្ញុំសង្ឃឹមថាវានឹងបានទៅដល់ដៃរបស់យោធា ។ ខ្ញុំសង្ឃឹមថា វាមិនភ្ជាប់ទៅនឹងដែលអាចជាការរំលោភសិទ្ធិ ឬអាចធ្វើឱ្យប៉ះពាល់ដល់កម្ពុជានោះទេ" ។

នៅក្នុងពិធីមួយស្រដៀងគ្នានេះនៅឯក្រសួងការពារជាតិកាលពីខែមីនាឆ្នាំមុន ចិនបានបញ្ជូនរថយន្តយោធាសង្គ្រោះបន្ទាន់២០គ្រឿង រថយន្តម៉ាកហ្ស៊ីប៣០គ្រឿង និងរថយន្តដឹកធុនធ្ងន់ ២០៧គ្រឿងដល់កម្ពុជាជាផ្នែកមួយនៃកិច្ចព្រមព្រៀងដូចគ្នានេះ ។

លោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសបានមានប្រសាសន៍ក្រោយពីពិធីកាលពីខែមិថុនានោះថា "យើងបានទទួលជំនួយពីប្រទេសចិនដោយគ្មានលក្ខខណ្ឌណាមួយឡើយ ។ វាមិនមានលទ្ធិពលណាមួយទេ" ៕

# និរទេសខ្មែរពីសហរដ្ឋ អាមេរិកនៅតែបន្ត

•••ការចាប់បញ្ជូនអតីតអ្នកទោសខ្មែរ ពីសហរដ្ឋអាមេរិក ទៅប្រទេសកម្ពុជាវិញនៅតែបន្ត បើទោះបីជាមានការតវ៉ាធ្វើបាតុកម្មសំដែងការមិនពេញចិត្តនឹងការអនុវត្តន៍ច្បាប់ ដែលពោរពេញដោយគំនិតអមនុស្សធម៌ បំបែកក្រុមគ្រួសារ ដែលមានប្រវត្តិឧក្រិដ្ឋ តែកែខ្លួនបានប្រសើរយូរឆ្នាំមកហើយក្តី។

ពីហ្វីឡាដែលហ្វៀ **មាលា** ដែលបានដឹកនាំចលនា One Love Moverment បានសរសេរថា អតីតអ្នកទោសខ្មែរនៅហ្វីឡានេះ ចាប់ផ្តើមធ្វើការនិរទេសតាំង២អាទិត្យរហូតមកដល់ថ្ងៃទី៣០ ខែឧសភា ឆ្នាំ២០១១ នេះជាថ្ងៃចុងក្រោយរួចហើយ។

តែទោះជាគ្មានបានលទ្ធផលប្រសើរក្តី មាលា បន្តថា "យើងបានចំណេញការគាំទ្រឹតតែច្រើនដែលធ្វើឱ្យយើងអាចតស៊ូបន្តថែរក្សាគ្រួសារឱ្យជួបជុំគ្នាបាន"។

## Detained Cambodian-Americans have been Deported

*Mia-lia B Kiernan*

Dear Friends,As many of you know, the Cambodian-American community in Philly was hit hard by the detention and deportation of friends and family members last fall. Throughout the past 9 months, the community has been organizing for the release of Cambodian-Americans who have been held at York County Prison, some for almost a year, away from their jobs, homes, families and children. Over the past two weeks, Cambodian-Americans in custody at York, PA were removed to Cambodia. The last flight left last night, in this case, separating a father from his four young children.



We want to take this time to thank all of you for your support, for coming out to our rallies, for making calls on behalf of these men to our legislators, for collecting signatures for our petitions to release them back to their families, and for generally showing us and the effected families so much love over the last 9 months. We feel devastated that the community's efforts did not lead to the release of these men back to their homes where they belong, but we know we are only at the start of a much larger struggle. We also feel tense about what is to come, and that we will continue to go through this dehumanizing process of mandatory detention and deportation of other loved ones in our Philly community. However, what we have gained is your love and support, which is what will keep us fighting to keep our families together. Please continue to hold these people and their families in your thoughts as they work towards readjusting their lives around policies which have left them broken apart.

"ALTHOUGH THE MOVEMENT HAS FACED MORE UPSETS THAN IT HAS FAVORABLE OUTCOMES, IT IS ONLY THROUGH DISAPPOINTMENT THAT ONE CAN TRULY APPRECIATE SUCCESS. SO WHEN THE TABLES DO TURN WE CAN ALL HONESTLY SAY - THROUGH THE SWEAT AND TEARS - THAT WE DID IT." ~ Chally Dang, May 17th, 2011

Detained September 21st, 2010Deported May 30th, 2011



## HELP WANTED

KhmerPost USA is seeking local contributed writers from Lowell area in both Khmer & English. No previous journalism experience is required.Since 2008, KhmerPost Newspaper has been incepted and served Cambodian communities in the East Coast of United States from Pennsylvania, to New Jersey, to Rhode Island, and now, since August 2010, we have been serving the State of Massachusetts. We are now covering entirely Lowell, Lynn, Revere, and will expand to Fall River. To help improve our content, we will need the participation from your community by feeding us the information about what's happening within your neighborhoods. Whether you are a college student, afull-time mom, or working professional, who just want to share news and information from your community to the rest of Cambodian communities, please don't hesitant to contact us.



## Vihi insurance-Income Tax Mortgage-Realty

**ធានារ៉ាប់រង_កាត់លើប្រាក់ចំណូល_ខ្ចីប្រាក់ទិញផ្ទះ_ទិញលក់ផ្ទះ**

**Insurance** **ធានារ៉ាប់រង**
(Licensed PA, NJ & DE) អាជ្ញាប័ណ្ណ PA, NJ & DE
Home • ផ្ទះ Car • រថយន្ត
Business • មុខរបរ Health • សុខភាព

**Income Tax** **កាត់លើប្រាក់ចំណូល**
Individual • ផ្ទាល់ខ្លួន Business • ពីមុខរបរ
Pay Roll • ពីប្រាក់ខែ
Forming New Business • បង្កើតមុខជំនួញថ្មី
Home Deed Transfer • ប្តូរឈ្មោះផ្ទះ
Auto Title Transfer • ប្តូរឈ្មោះម្ចាស់រថយន្ត

Mon.-Fri.: 10 am-6pm . Sat: 11 am-3pm

INCOME TAX
Auto Home Business Life

**Vihi Mortgage** **Vihi ខ្ចីប្រាក់ទិញផ្ទះ**
(Licensed by PA Dept. of Banking) • អាជ្ញាប័ណ្ណពី PA ការិយាល័យធនាគារ
Hiep Vo, MBA, President. • ហ៊ីប វ៉ូ MBA ប្រធាន
Finance/Refinance your home • ផ្តល់ប្រាក់កម្ចីក្នុងការទិញផ្ទះទិញដំបូង ឬកណ្តាលទី
Low interest Rate & Down Payment • ការប្រាក់ថោក និងលុយកក់តិច
Fast Preapproval • ចម្លើយលឿន

Vihi Realty Co
Dr. Hanh Vo, Broker/Owner Cell (267) 664-2689
Buy & Sell Properties & Businesses
Visit: www.drhanh.net for more foreclosure homes

North Phila – 215-276-8441
5225 N. 5th Street
Phila., Pa 19120

South Phila – 215-336-0600
1519 W. Passyunk Ave.
Phila., Pa 19145
www.vihifinancial.com

## ហាងមាសស្រស្មី

**SUNSHINE JEWELRY, INC.**
**215-271-2950**

Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong

702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com

## Phở Hà Saigon

*Vietnamese Restaurant*

**7 days A Week 9am-9pm**

B.Y.O.B.

ជាហាងដែលធ្វើ ហ្វើ ឆ្ងាញ់ជាងគេនៅហ្វីឡាដែលហៀរ
ចុងភៅដែលពូកែធ្វើ ហ្វើ និងម្ហូបផ្សេងៗឯទៀត
ត្រូវមាត់ភ្ញៀវគ្រប់ៗរូប ឥឡូវនេះមកធ្វើម្ហូបនៅហាងយើងខ្ញុំ
ហើយធានាថា ម្ហូបអាហារហាង Phở Hà Saigon
និងបំរើលោកអ្នកបានយ៉ាងពេញចិត្តគ្រប់ពេលវេលា

S. 5th St
S. 4th St
S. 3rd St
S. 2nd St
W Porter St
W Shunk St
Greenwich Recreation Center
Phở Hà Saigon
W. Oregon Ave
Toys R Us
Schuylkill Expy
Delaware Expy
76

VISA MasterCard DISCOVER

**320 W. Oregon Avenue, Suite 1. Philadelphia, PA 19147**
**Tel: (215) 389-1002 (Inside Oregon Market)**

# បុណ្យអុំទូកលើកទី១៤នៅឡូវែល

●●●ដោយយោងតាមលំនាំបុណ្យអុំទូកដ៏ល្បីល្បាញនៅប្រទេសកម្ពុជា សហគមន៍ខ្មែរបានប្រារព្ធវប្បធម៌របស់ខ្លួន នៅឡូវែល រដ្ឋម៉ាសាឈូសែត ឆ្នាំ១៩៩៧ ដែលបានបណ្តាលឱ្យតំបន់នោះ ក្លាយជាតំបន់




ដែលមានមនុស្ស ៥-៦ម៉ឺននាក់ជួបជុំគ្នានាខែសីហាជារៀងរាល់ឆ្នាំបន្តបន្ទាប់ ដើម្បីធ្វើបុណ្យប្រណាំងទូក និងតាំងតបង្ហាញផលិតផលក្នុងតំបន់ បង្ហាញជូនសាធារណជនដែលមកពីទីជិតឆ្ងាយ ។

ឆ្នាំ២០០២ ពិធីបុណ្យអុំទូកខ្មែរ បានក្លាយជាពិធីបុណ្យអុំទូករបស់ក្រុមអាស៊ី ដែលមានខ្មែរ-លាវ-ថៃ -វៀតណាម ចូលរួមជាសមាគមមិនយកកំរៃ ។ សមាគមនោះមានឈ្មោះថា The Lowell Southeast Asean Water Featival ជាអ្នកគ្រប់គ្រងរៀបចំកម្មវិធីអុំទូកនៅទីក្រុងឡូវែល ។

**ឆ្នាំនេះពិធីបុណ្យអុំទូកនៅឡូវែល នឹងប្រព្រឹត្តទៅនៅថ្ងៃសៅរ៍ ទី២០ ខែសីហា ឆ្នាំ២០១១ខាងមុខនេះ ។**

*(ខ្មែរប៉ុស្ត៍)*

# ជម្ងឺមហារីកសុដន់ស្ត្រីមកពីអាស៊ីកំពុងកើនចំនួន

●●●ជាទូទៅស្ត្រីអាស៊ី កាលពីនៅប្រទេសរបស់ខ្លួនមានកើតជម្ងឺមហារីកតិចតួចតែនៅពេលមកដល់សហរដ្ឋអាមេរិក ចំនួននោះបានកើនឡើង ដោយសារទម្រង់នៃការរស់នៅថ្មីមានការផ្លាស់ប្តូរ ។ ក៏ប៉ុន្តែទោះជាច្រើនយ៉ាងនេះក្តី ក៏ចំនួននេះនៅតិចជាងចំនួនស្ត្រីអាមេរិកាំងកើតជម្ងឺដដែលនេះដែរ ។

អង្គការសុខភាពសុដន់ចំនួនពីរ បានដឹកមុខទប់ស្កាត់ជម្ងឺមហារីកនេះ ដោយចេញធ្វើការអប់រំ ដោយប្រើមធ្យោបាយអប់រំ១២ភាសា ដែលក្នុងនោះមានភាសាខ្មែរសម្រាប់សហគមន៍ខ្មែរទទួលការអប់រំតាមភាសាដើមរបស់ខ្លួនបាន ។ អ្នកគ្មានអ៊ិនស្វ៊ីរ៉ង់ក៏អាចឆ្លុះផែកមើលជម្ងឺមហារីកនេះបានដោយមិនយកកំរៃ ។





ថ្ងៃទី៤ ខែមិថុនាខាងមុខនេះ នឹងមានការផ្សព្វផ្សាយពន្យល់ពីកម្មវិធីទប់ស្កាត់ជម្ងឺមហារីកនៅសណ្ឋាគារ ស្ហេរ៉ាតុន ហ្វីឡាដែលហ្វៀ សូមអញ្ជើញ ទាក់ទងសមាគមខ្មែរ ដើម្បីសម្រួលការដឹកជញ្ជូនពីសមាគម តាមរយៈទូរស័ព្ទ : 215 324 4070 ៕ (ខ្មែរប៉ុស្ដិ៍)

## Breast Cancer Rates on the Rise among Asian-Americans

*Philly health organizations partner to spread early detection message to local Asian-American community*

Breast cancer rates among Asian-Americans have been historically lower than those of other Americans. But the risk of breast cancer increases among Asians who migrate to the United States. "Much of this increase can be linked to small lifestyle changes many Asian women make when they come to this county," says Wan Ling Hung, Senior Community Cancer Control Specialist for the American Cancer Society. "The adoption of a more Westernized lifestyle, such as changes in the diet and limited physical activity, are believed to be contributing factors."

To combat the increased risk to Asian-American women for developing breast cancer, the American Cancer Society and the Susan G. Komen for the Cure - Philadelphia, have teamed up to make Asian-American women living in the Delaware Valley more aware that they may be at greater risk for the disease than once thought.

The two leading breast health organizations will hold a free educational program where doctors and health educators will answer questions about risk factors and early detection of breast cancer and women's health topics including nutrition, exercise, and access to language assistance. The program will be done in 12 languages: Burmese, Cambodian, Mandarin, Cantonese, Gujarati, Hindi, Indonesian, Korean, Malayalam, Nepali, Vietnamese, and English. Asian-American women attending the program will be able to schedule a mammogram at area hospitals; the mammograms will be provided free of charge to eligible women who have no health insurance. The program will be held on Saturday, June 4, 2011 from 10:00am – 2:30pm, at the Sheraton Philadelphia City Center Hotel. For more information how to participate in this free event, please contant Cambodian Association of Greater Philadelphia at 215-324-4070 for the bus schedule.



The American Cancer Society is the nationwide community -based voluntary health organization dedicated to eliminating cancer as a major health problem by preventing cancer, saving lives, and diminishing suffering from cancer, through research, education, advocacy, and service. Founded in 1913 and with national headquarters in Atlanta, the Society has 13 Divisions and local offices in 3,400 communities.

Susan G. Komen for the Cure was born in a promise between two sisters—Nancy Brinker to her sister, Susan G. Komen, who died from breast cancer at the age of 36. Since launching the breast cancer movement 25 years ago, Komen for the Cure has transformed the culture—investing nearly $1 billion in the cause and turning breast cancer into a priority health issue for women, researchers, health professionals and politicians.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំនាន់ថ្មីប្រែសម្រួលពីភាសាអង់គ្លេស

អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី១៣ ខែឧសភា ឆ្នាំ២០១១

# Tribunal Judges Lash Out at Critics, Media

By Douglas Gillison
THE CAMBODIA DAILY

After weeks of mounting criticism, the Khmer Rouge tribunal's investigating judges yesterday hit back at the news media, defending their judicial independence and denying that the court was headed for "collapse."

Judges You Bunleng and Siegfried Blunk also rejected as a "malicious rumor" recent reports that they were considering contempt of court proceedings against the British Co-Prosecutor Andrew Cayley.

Mr Cayley is now appealing an order from the judges to retract a May 9 statement that revealed information about a recently concluded investigation of revolutionary military leaders who have been neither questioned nor charged.

Mr Cayley, who enjoys legal immunity for all official acts, said the judges had not been thorough in their work.

"The co-investigating judges have worked independently from outside interference, will continue to resist all such attempts and are resolved to defend their independence against outside interference, wherever it may come from," yesterday's statement said.

Issued late yesterday afternoon, the statement took specific exception to an article appearing this week in International Justice Tribune, a publication of Radio Netherlands Worldwide.

The report asserted that the court's "future hangs in the balance" due to the apparent acrimony among the court's judicial officers over the conduct of investigations that are opposed by Prime Minister Hun Sen.

The statement, which denounced the article's claims as "baseless" and "nonsensical," was nevertheless made amid mounting information from people with knowledge of the matter that Judge Blunk is at odds with his own investigators.

Both Judge Blunk and Judge Bunleng have reportedly agreed to dismiss cases 003 and 004 without investigation.

Mr Hun Sen has said since 1999 that only five people will be tried and flatly told UN Secretary-General Ban Ki-moon that the current investigations of an additional five suspects would not be "allowed."

Cambodian judicial officers have uniformly adhered to this view. After initially backing out of the cases last year, Judge Bunleng later agreed to cooperate—after field investigations were halted.

Youk Chhang, director of the Documentation Center of Cambodia, said yesterday that, by releasing virtually no information about the progress of cases 003 and 004, the investigating judges had shown "a lack of respect for the victims."

The closure of Case 003 after 20 months with no public statements about the case's scope or contents, was reminiscent of a Khmer Rouge slogan: "Secrecy is the key to victory," he said.

"It seems to me that OCIJ needs to be less insecure," he said, referring to the court's Office of the Co-Investigating Judges. "It is being too secret. I just don't understand, to be honest."

In an open letter to UN Special Expert Clint Williamson, who is in Phnom Penh this week, Ou Virak, president of the Cambodian Center of Human Rights, said Wednesday that Judge Blunk's actions "were a matter of utmost concern."

"His actions raise the question of whether the United Nations has conceded to the demands of the [government] and is now acting to prevent any further cases from going to trial and to ensure the closure of the [tribunal] with the closure of Case 002," the letters said.

Trial in Case 002 is to begin next month.

Through the tribunal's public affairs office, Mr Williamson said Wednesday that the UN could not directly answer such charges.

"As is our normal practice, the United Nations does not intend to comment on the role of any judge in the independent judicial process, any proceedings that may or may not go forward, nor any speculations concerning these issues," he said.

# ចៅក្រមសាលាក្តីវាយបកអ្នករិះគន់ និងបណ្តាញផ្សព្វផ្សាយព័ត៌មាន

ដោយ : Douglas Gillison

THE CAMBODIA DAILY

បន្ទាប់ពីមានការរិះគន់កាន់តែកើនឡើងរយៈពេលប៉ុន្មានសប្តាហ៍មក កាលពីម្សិលមិញចៅក្រមស៊ើបសួរនៅសាលាក្តីខ្មែរក្រហមបានវាយបកបណ្តាញផ្សព្វផ្សាយព័ត៌មាន ដោយនិយាយការពារភាពឯករាជ្យនៃប្រព័ន្ធតុលាការរបស់ខ្លួន ហើយបដិសេធការដែលថា សាលាក្តីឈានទៅរក "ការដួលរលំ" ។

ចៅក្រម យូ ប៊ុនឡេង និងចៅក្រម Siegfried Blunk ក៏បានច្រានចោលសេចក្តីរាយការណ៍កាលពីពេលថ្មីៗដែលថា លោកទាំងពីរកំពុងពិចារណាលើបណ្តឹងពាក់ព័ន្ធការប្រមាថនីតិវិធីតុលាការដោយលោក Andrew Cayley សហព្រះរាជអាជ្ញាជនជាតិអង់គ្លេសថាជា "ពាក្យចចាមអារ៉ាមក្នុងបំណងព្យាបាទ" ។

ឥឡូវនេះលោក Cayley កំពុងប្តឹងជំទាស់នឹងការបង្គាប់របស់ចៅក្រមឱ្យលោកដកសេចក្តីប្រកាសចុះថ្ងៃទី៩ ខែឧសភា ដែលលាតត្រដាងអំពីការស៊ើបអង្កេតមេដឹកនាំយោធាបដិវត្តន៍ដែលទើបបញ្ចប់ ថ្មីៗ ដែលមិនទាន់ត្រូវបានសាកសួរ ឬធ្វើការចោទប្រកាន់នោះ ។

លោក Cayley ដែលមានឯកភ័យឯកសិទ្ធិផ្លូវច្បាប់ចំពោះសកម្មភាពផ្លូវការគ្រប់យ៉ាងបានមានប្រសាសន៍ថា ក្រុមចៅក្រមមិនបានធ្វើការហ្មត់ចត់ក្នុងកិច្ចការរបស់ខ្លួនឡើយ ។

សេចក្តីប្រកាសរបស់ចៅក្រមស៊ើបសួរកាលពីម្សិលមិញបានលើកឡើងថា "សហចៅក្រមស៊ើបអង្កេតបានធ្វើការដោយឯករាជ្យពីការជ្រៀតជ្រែកពីខាងក្រៅនឹងបន្តប្រឆាំងរាល់ការប៉ុនប៉ងដូចនេះ ហើយនឹងការពារភាពឯករាជ្យរបស់ខ្លួនពីការជ្រៀតជ្រែកពីខាងក្រៅ មិនថាពីប្រភពណាឡើយ ។

ដោយត្រូវបានចេញផ្សាយកាលពីល្ងាចថ្ងៃម្សិលមិញសេចក្តីប្រកាសនេះបានជំទាស់ទៅនឹងអត្ថបទមួយដែលចុះផ្សាយនៅសប្តាហ៍ នេះលើទំព័រទស្សនាវដ្តី International Justice Tribune ជាទស្សនា វដ្តីតាមប្រព័ន្ធអ៊ីនធឺណិតរបស់បណ្តាញព័ត៌មានវិទ្យុនិងទូរទស្សន៍ Radio Netherlands Worldwide ។

របាយការណ៍នេះបានអះអាងថា "អនាគតរបស់សាលាក្តីនេះស្ថិតក្នុងភាពច្បាស់លាស់" ដោយសារតែការស្វែងតំនិតគ្នាយ៉ាងច្បាស់ក្រឡែតក្នុងចំណោមមន្ត្រីតុលាការរបស់សាលាក្តីជុំវិញការស៊ើបអង្កេតដែលត្រូវបានជំទាស់ដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ។

ទោះជាយ៉ាងណា សេចក្តីប្រកាសនេះដែលបានច្រានចោលការអះអាងរបស់អត្ថបទនេះថា "គ្មានមូលដ្ឋាន" និង "គ្មានហេតុផល" បានធ្វើឡើងអំឡុងពេលមានព័ត៌មានកាន់តែច្រើនឡើងពីអ្នកដែលដឹងពីបញ្ហាដែលថា ចៅក្រម Blunk មានការខ្វែងគំនិតគ្នាជាមួយក្រុមអ្នកស៊ើបអង្កេតរបស់លោកផ្ទាល់ ។

តាមព័ត៌មានថា ទាំងចៅក្រម Blunk និងចៅក្រម យូ ប៊ុនឡេង បានយល់ព្រមច្រានចោលសំណុំរឿង០០៣និង០០៤ ដោយមិនធ្វើការស៊ើបអង្កេត ។

លោក ហ៊ុន សែន បានមានប្រសាសន៍តាំងពីឆ្នាំ១៩៩៩មកថា មានមនុស្សតែ៥នាក់ប៉ុណ្ណោះ ដែលត្រូវកាត់ទោស ហើយបានប្រាប់លោក បាន គីមូន អគ្គលេខាធិការអង្គការសហប្រជាជាតិយ៉ាងដាច់ណាត់អំឡុងដំណើរទស្សនកិច្ចរបស់លោកកាលពីខែតុលា មកពីទីក្រុងភ្នំពេញថា ការស៊ើបអង្កេតបច្ចុប្បន្នលើជនសង្ស័យ៥នាក់បន្ថែមទៀតនឹងមិនត្រូវបាន "អនុញ្ញាត" ទេ ។

ក្រុមមន្ត្រីតុលាការកម្ពុជាបានប្រកាន់ភ្ជាប់ចំពោះទស្សនៈនេះ ។ បន្ទាប់ពីបានសម្រេចចិត្តមិនធ្វើការស៊ើបអង្កេតរឿងក្តីទាំងនេះពីដំបូងកាលពីឆ្នាំមុននោះ ចៅក្រម យូ ប៊ុនឡេង ក្រោមមកបានយល់ព្រមសហការបន្ទាប់ពីការស៊ើបអង្កេតចុះផ្ទាល់ត្រូវបានបញ្ឈប់ ។

លោក ឆាំង យុ ប្រធានមជ្ឈមណ្ឌលឯកសារកម្ពុជាបានមានប្រសាសន៍កាលពីម្សិលមិញថា ដោយមិនចេញផ្សាយព័ត៌មានណាមួយសោះស្តីអំពីការវិវឌ្ឍន៍នៃសំណុំរឿង០០៣និង០០៤នោះ ចៅក្រមសាកសួរបានបង្ហាញពី "កង្វះនៃការគោរពចំពោះជនរងគ្រោះ" ។

លោកបានមានប្រសាសន៍ថា ការបិទសំណុំរឿង០០៣ បន្ទាប់ពីរយៈពេល២០ខែ ដោយគ្មានសេចក្តីប្រកាសជាសាធារណៈអំពីទំហំ ឬខ្លឹមសាររបស់សំណុំរឿងសោះនោះ ធ្វើឱ្យគេដឹងឃើញដល់ពាក្យស្លោកខ្មែរក្រហមថា "ការសម្ងាត់គឺជាគន្លឹះឆ្ពោះទៅរកជ័យជំនះ" ។

ដោយសំដៅដល់ការិយាល័យសហចៅក្រមស៊ើបអង្កេតរបស់សាលាក្តី លោកបានមានប្រសាសន៍ថា "ខ្ញុំយល់ថា ការិយាល័យសហចៅក្រមស៊ើបអង្កេតចាំបាច់ត្រូវមាន ។ វាមានលក្ខណៈសម្ងាត់ពេកហើយ ។ និយាយតាមត្រង់ ខ្ញុំមិនយល់ទាល់តែសោះ "។

នៅក្នុងលិខិតចំហមួយផ្ញើជូនលោក Clint Williamson ជាអ្នកនាំពាក្យពិសេសរបស់អង្គការសហប្រជាជាតិដែលបានចាប់ផ្តើមទស្សនកិច្ចមួយមកកាន់ទីក្រុងភ្នំពេញនៅសប្តាហ៍នេះ លោក អ៊ូ វីរៈ ប្រធានមជ្ឈមណ្ឌលសិទ្ធិមនុស្សកម្ពុជា បានមានប្រសាសន៍កាលពីថ្ងៃពុធថា សកម្មភាពរបស់ចៅក្រម Blunk គឺគួរឱ្យព្រួយបារម្ភបំផុត"។

លិខិតនេះបានលើកឡើងទៀតថា "សកម្មភាពរបស់លោកចោទជាសំនួរថា តើអង្គការសហប្រជាជាតិបានទោរទន់តាមការទាមទាររបស់ (រដ្ឋាភិបាល) ហើយឥឡូវនេះកំពុងចាត់វិធានការទប់ស្កាត់សំណុំរឿងបន្ថែមទៀតមិនឱ្យឡើងដល់តុលាការ និងធានាពីការបិទ (សាលាក្តី) នេះត្រឹមសំណុំរឿង០០២ ឬយ៉ាងណា" ។

ការបើកសវនាការសំណុំរឿង០០២ នឹងចាប់ផ្តើមនៃខែក្រោយនេះ ។ តាមរយៈការិយាល័យកិច្ចការសាធារណៈរបស់សាលាក្តី លោក Williamson បានមានប្រសាសន៍កាលពីថ្ងៃពុធថា អង្គការសហប្រជាជាតិមិនអាចឆ្លើយតបដោយផ្ទាល់ចំពោះការចោទប្រកាន់បែបនេះទេ ។

"ដូចជាពេលកន្លងមកដែរ អង្គការសហប្រជាជាតិមិនធ្វើអត្ថាធិប្បាយអំពីតួនាទីរបស់ចៅក្រមណាម្នាក់នៅក្នុងដំណើរការតុលាការឯករាជ្យ នីតិវិធីណាមួយដែលអាច ឬមិនអាចដំណើរការទៅមុខ ឬការប៉ាន់ស្មានណាមួយដែលពាក់ព័ន្ធទៅនឹងបញ្ហាទាំងនេះទេ" ៕

## Cambodia, Vietnam to Lift Tariffs on Exports

Following a bilateral trade agreement signed last year, Cambodia will from next month be able to export 60 agricultural and fishing products tax free to Vietnam, according to a statement released yesterday by the Commerce Ministry. As part of the agreement, Vietnam will also be able to export 13 industrial products tax free to Cambodia. Duty-free exports from Cambodia include products such as shrimp, vegetables, tobacco and coffee. Kong Putheara, director of trade at the Commerce Ministry, said that being rid of the tariffs would help bilateral trade between the two countries surpass the $2 billion mark this year. He also said it would be an incentive for Cambodia to increase agricultural production. "I believe the local production will increase," he said. Exports to Vietnam increased from $20 million in the first quarter of 2010 to $37 million during the same period this year. First-quarter Vietnamese imports in the same period grew by $64 million, to $295 million. *(Hul Reaksmey)*

## កម្ពុជានិងវៀតណាមនឹងលើកលែងពន្ធសម្រាប់ការនាំចេញនៅខែក្រោយ

ដោយ : ហ៊ុល រស្មី

THE CAMBODIA DAILY

យោងតាមសេចក្តីថ្លែងការណ៍មួយចេញកាលពីម្សិលមិញដោយក្រសួងពាណិជ្ជកម្មបានឱ្យដឹងថា បន្ទាប់ពីកិច្ចព្រមព្រៀងពាណិជ្ជកម្មទ្វេភាគីមួយត្រូវបានចុះហត្ថលេខាកាលពីឆ្នាំមុននោះ ប្រទេសកម្ពុជានឹងអាចនាំចេញផលិតផលកសិកម្ម និងផលិតផលនេសាទចំនួន៦០ប្រភេទទៅកាន់ប្រទេសវៀតណាម ដោយមិនចាំបាច់បង់ពន្ធចាប់ពីខែក្រោយនេះទៅ។ ជាផ្នែកនៃកិច្ចព្រមព្រៀងនេះប្រទេសវៀតណាមក៏នឹងអាចនាំចេញផលិតផលកសិកម្មចំនួន១៣ប្រភេទមកកម្ពុជាដោយរួចពន្ធផងដែរ ។ ទំនិញនាំចេញដែលរួចពន្ធពីកម្ពុជា រួមមានដូចជាបង្គា បន្លែ ថ្នាំជក់ និងកាហ្វេ ។ លោក គង់ ពុទ្ធារា ជាប្រធាននាយកដ្ឋានពាណិជ្ជកម្មនៅក្រសួងពាណិជ្ជកម្ម បានមានប្រសាសន៍ថា ការឱ្យរួចពន្ធនេះវានឹងជួយឱ្យពាណិជ្ជកម្មទ្វេភាគីរវាងប្រទេសទាំងពីរលើស២ពាន់លានដុល្លារនៅឆ្នាំនេះ ។ លោកក៏បានមានប្រសាសន៍ដែរថា វាជាគ្រឿងលើកទឹកចិត្តមួយសម្រាប់កម្ពុជាបង្កើនផលផលិតកម្មកសិកម្ម ។ លោកបានមានប្រសាសន៍ថា "ខ្ញុំជឿថា ផលិតកម្មក្នុងស្រុកនឹងកើនឡើង" ។ ការពារនាំចេញទៅប្រទេសវៀតណាម បានកើនឡើងពី២០លានដុល្លារនៅក្នុងត្រីមាសទី១នៃឆ្នាំ២០១០ ដល់៣៧លានដុល្លារអំឡុងរយៈពេលដូចគ្នានេះនៅឆ្នាំនេះ។ ការនាំចូលរបស់វៀតណាម នៅក្នុងត្រីមាសទី១ក្នុងរយៈពេលសូចគ្នានេះបានកើនឡើង៦៤លានដុល្លារដល់២៩៥លានដុល្លារ ៕




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

•**១២ កុម្ភៈ** :សេចក្តីសម្រេចបង្កើតកម្លាំង "TASK Force "របស់ អ.ស.ប បានធ្វើឡើងទុកសម្រាប់សកម្មភាពអន្តរាគមន៍នៃកម្ពុជា ។

•**១៣-១៤ កុម្ភៈ** : នៅក្រុងញូវយ៉ក មានការប្រជុំពិភាក្សារវាងសមាជិកអចិន្ត្រៃយ៍ទាំងប្រាំ (5 Perm) គេសម្រេចបានការព្រមព្រៀងលើ៤ចំណុចនៃបញ្ហាកម្ពុជា : លំនាំតាមលំដាប់លំដោយនៃការដកកងកម្លាំងយួន, ភាពចាំបាច់ត្រូវតែបញ្ឈប់ការបាញ់គ្នា, ការចាំបាច់ត្រូវតែបញ្ចប់ និងបញ្ឈប់ជំនួយសម្ភារៈដល់គ្រប់ភាគីពាក់ព័ន្ធ, ការប្រមូលផ្តុំ និងការបោះជំរំតាមតំបន់នីមួយៗ នឹងត្រូវឱ្យអនុវត្តដោយភាគីជម្លោះទាំងបួន ។

•**១៨ កុម្ភៈ** : នាឱកាសប្រជុំរវាងសមាជិកអឺរ៉ុប (CEE) និងអាស៊ាន (ASEAN) នៅប្រទេសម៉ាឡេស៊ី ។ សមាគមអឺរ៉ុបបានកំណត់ដោយដឹងថាខ្លួនពុំទទួលគាំទ្ររដ្ឋាភិបាលជាតនៃកម្ពុជា (GNC) ក្នុងការរក្សាកៅអីដែលមាននៅ អ.ស.ប ទេ ។

•**២១ កុម្ភៈ** : ជំនួបទី៦ រវាងស្តេចសីហនុ និងហ៊ុន សែន នៅទីក្រុងបាងកក ។ ទាក់ទងទៅនឹងរយៈពេលបណ្តោះអាសន្ននៃរដ្ឋាភិបាលថ្មីមួយនៅកម្ពុជា គេបានធ្វើសេចក្តីកំណត់ហេតុ ដែលមានកម្រិតទទួលខុសត្រូវច្បាស់លាស់មួយ និងការសម្រេចជាផ្លូវការមួយទៀត ស្តីអំពីការបង្កើតឱ្យមានប្រព័ន្ធរដ្ឋបាលបណ្តោះអាសន្ន ដែលដើរតួជានិមិត្តរូបនៃបូរណភាពជាតិ និងឯករាជ្យជាតិដ៏ច្បាស់លាស់មួយ ។

•**២៣ កុម្ភៈ** : ស្តេចសីហនុ សម្រេចព្រះទ័យថាត្រូវតែមកដាក់ទីតាំងលើទឹកដីកម្ពុជា ក្នុងតំបន់ភូមិសេរីភាព ដែលគ្រប់គ្រងដោយកម្លាំងសីហនុនិយម (ANS) ។ កងកម្លាំងរដ្ឋាភិបាលរបបភ្នំពេញ បានវាយយកទីតាំងស្រុកស្វាយចេកមកវិញ ។

•**២៦-២៨ កុម្ភៈ** : សន្និសីទ (JMC II) នៅទីក្រុងហ្សាការតា ស្តីពីប្រទេសកម្ពុជា ត្រូវបានដឹកនាំក្រោមរូបភាពកិច្ចប្រជុំក្រុងប៉ារីស ដែលមានរដ្ឋាភិបាលជាតិកម្ពុជា, របបរដ្ឋកម្ពុជា, ប្រទេសទាំង៦នៃអាស៊ាន (ASEAN) បន្ថែមដោយប្រទេសឡាវ, យួន, បារាំង ព្រមទាំងអគ្គលេខាធិការដ្ឋាននៃអ.ស.ប ផងនោះ ។ គម្រោងប្រជុំប្រចាំថ្ងៃ ការសិក្សា និងពិនិត្យលើគម្រោង RED BOOK ដែលល្អទៅៗរបស់អូស្ត្រាលី ។ គេសង្កេតឃើញថា មានការទ្រឹងស្ងាត់ មិនចេញសម្លេងពីចំណោមភាគីកម្ពុជាទាំងអស់ ។ RED BOOK នេះមាន១៥០ទំព័រ ។

•**០១ មីនា** : ភាគីយួន រំលឹកថា នឹងទទួលភារកិច្ចជួយរដ្ឋកម្ពុជា ក្រោមរូបមន្តត្រឹមត្រូវល្អបំផុត ។

•**០៦ មីនា** : នាយករដ្ឋមន្ត្រីថៃ ឆាត់ឆៃចាក់ឈុនណាវិន្ទ ស្នើឱ្យបង្កើតជំរំថ្មីដែលអព្យាក្រិត្យមួយសម្រាប់ជនភៀសខ្លួនកម្ពុជា ដើម្បីឱ្យអាចគេចផុតពីអន្ទាក់នយោបាយទាំងឡាយ ។

•**១២-១៣ មីនា** : ការរួមប្រជុំគ្នារវាងសមាជិកអចិន្ត្រៃយ៍ទាំងប្រាំរបស់អង្គការសហប្រជាជាតិ ដែលបានបង្កើតចេញនូវរបៀបរបបបោះឆ្នោតសកលមួយសម្រាប់កម្ពុជា ។

•**៣០ មីនា** : បេសកកម្មបច្ចេកទេសរបស់អង្គការសហប្រជាជាតិ ត្រូវបង្កើតឡើងដើម្បីសិក្សារូបបទនៃរដ្ឋបាលគ្រប់គ្រងមួយ ដែលអាចទទួលបានដំណើរការនូវបេសកកម្មអង្គការសហប្រជាជាតិណាមួយជាយថាហេតុ ។

•**០៨-២៥ មីនា** : ការវាយគ្នាទៅវិញទៅមកមានសភាពដ៏ក្តៅគគុករវាងភាគីពាក់ព័ន្ធ ។

•**១០ មេសា** : ក្រិតមួយទទួលស្គាល់សាសនាគ្រីស្ទ (Christian) ថ្វីត្បិតតែការត្រួតពិនិត្យឃ្លាំមើលនៅតែមានយ៉ាងហ្មត់ចត់ក៏ដោយ ។

•**១១ មេសា** : ព្រឹទ្ធសភា រ៉ូប៊ែតេរី នៃសហរដ្ឋអាមេរិក បានចូលជួបនឹង ហ៊ុន សែន នៅភ្នំពេញ ។

•**១២ មេសា** : ការបាញ់បំផ្លោងចេញពីកងកម្លាំងរបបរដ្ឋកម្ពុជា លើភូមិសន្តិភាពនៃក្រុមសីហនុនិយម បានធ្វើឱ្យក្រុមនោះរត់ចេញចោលពីទីតាំងខាងលើនេះ ។

•**២៥ មេសា** : អ្នកកាសែត ពីទ័រ ហ្សេនីញ នៃទូរទស្សន៍អេប៊ីស៊ីបាន និយាយចោទប្រកាន់រដ្ឋាភិបាលថា សហរដ្ឋអាមេរិកជាអ្នកជម្រុញ និងគាំទ្រដល់ការវិលត្រឡប់មកវិញ នូវភាគីខ្មែរក្រហម ដោយសម្តេចធ្វើការគាំទ្រត្រីភាគីចម្រុះនេះ ។ ការធ្វើអង្កេតនេះត្រូវបានធ្វើឡើងនៅប្រទេសថៃឡង់ និងក្នុងចំណោមមតិនៃក្រុមរដ្ឋាភិបាលជាតិកម្ពុជា ។ សេចក្តីប្រកាសនេះ វាស្របទៅនឹងសេចក្តីសន្និដ្ឋានរបស់ វីលីយ៉ាម កុលប៊ី នៃនាយកដ្ឋានស៊ើបការសំងាត់ សេអ៊ីអា (CIA) និង អាត់តីញ ដែលជាតំណាងរាស្ត្ររបស់អាមេរិកាំង ។

•**២០ ។២៥ មេសា** : ទស្សនកិច្ចនៃក្រុមសភាអឺរ៉ុប ត្រូវបានដឹកនាំដោយ ក្លូតស្សេសសុង ដែលជារដ្ឋមន្ត្រីទំនាក់ទំនងអន្តរជាតិបារាំង ។

**(នៅមានតលេខក្រោយទៀត)**




# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១២៦-** នៅឯព្រៃមិគទាយវ័ន ពេលដែលសមណៈទាំង៥អង្គបានឃើញព្រះពុទ្ធជាអម្ចាស់ពីចម្ងាយដែលកំពុងតែស្តេចយាងមក ពួកភិក្ខុទាំងអស់និយាយគ្នាថា "ចូរមើលហ្ន៎! សមណគោត្តមកំពុងនិមន្តតំរង់មករកយើងហើយ ។ ព្រះអង្គទ្រង់បានបោះបង់ទុក្ករកម្មចោល ហើយត្រឡប់មកជាអ្នកប្រាថ្នាច្រើនទៅវិញ ។ នៅពេលព្រះអង្គនិមន្តមកដល់ ចូរយើងកុំនិយាយអ្វីជាមួយព្រះអង្គឡើយ ចូរកុំធ្វើបដិសណ្ឋារកិច្ចគោរពព្រះអង្គទាំងកុំទទួលចីវរ និងបាត្រពីព្រះអង្គឱ្យសោះ ។ យើងគ្រាន់តែក្រាលអាសនៈទុកចោលនៅទីនោះបានហើយ ។ ទុកឱ្យព្រះអង្គគង់ដោយព្រះអង្គឯងទៅចុះបើមិនអីចឹងទេ ទុកឱ្យព្រះអង្គឈរក៏បានដែរ ។ តើមាននរណាគេទៅរវល់ខ្វល់ខ្វាយរាក់ទាក់ជាមួយនឹងជាមួយនឹងមនុស្សក្រឡិចក្រឡុចដូចជាព្រះអង្គនុ៎ះ" ។

**១២៧-** ប៉ុន្តែខណៈដែលសមណៈទាំង៥អង្គក្រឡេកភ្នែកទៅឃើញព្រះពុទ្ធជាម្ចាស់នៅពេលដែលព្រះអង្គនិមន្តកាន់តែជិតដល់ពួកខ្លួន សមណៈទាំងអស់បានឃើញថាព្រះអង្គមិនមែនជាមនុស្សដូចដែលគេបានគិតទុកនោះទេ ។ គេបានដឹងយ៉ាងច្បាស់ថា ព្រះពុទ្ធជាបុគ្គលដ៏ប្រសើរអស្ចារ្យមានព្រះបញ្ញាវាងវៃក្រៃលែងឥតប្រៀបផ្ទឹមបាន មានពន្លឺរស្មីចិញ្ចែងចិញ្ចាចផ្សាយចេញពីរង្វង់ព្រះសិរសៈ ព្រះអង្គពួកសមណៈទាំងអស់មិនធ្លាប់ឃើញបុគ្គលបែបនេះទាល់តែសោះតាំងតែពីមុនមក ។ មែនហើយពួកគេភ្ញាក់លង្វើលចិត្តឥតឧបមា ដែលធ្វើឱ្យគេភ្លេចអស់នូវអ្វីៗដែលគេទើបបាននិយាយគ្នា ។ អង្គខ្លះរត់ទៅថ្វាយបង្គំព្រះអង្គ និងស្ទុះស្ទារម្នីម្នាទៅដងទឹកបំរើព្រះអង្គដោយសព្វគ្រប់ ។

**(នៅមានតលេខក្រោយទៀត)**

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.



126- At Mrgadava, when the five Sramanas saw the Buddha approaching in the distance, they spoke among themselves; "Look there! Sramanas Gautama is coming straight over. He has abandoned asceticism and has become a voracious person. Where he arrives, let's not talk to him nor even greet him nor take his robe and bowl. Let's only prepare a cushion here. Let him sit down if he likes; otherwise let him stand. Who would bother to greet a man of shaky will like him!"



127- But when the five Sramanas looked at the Buddha as he approached nearer to them, they found that he was not the sort of person they had thought him to be. They began to be aware that the Buddha was incomparably noble and serious and brilliant in the light of his halo; they had never seen such person before. They were so astonished, indeed, that they unconsciously forgot what they had just been quickly ran over and bowed, respectfully taking his robe and bowl from the Buddha's hands, while others prepared the cushion on the seat and rushed to get water to serve him.

*(Continued to After Issue)*

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា ស៊ីន សាន



ដោយ : ម៉ម យ៉ឹន

•••គណកម្មាធិការអន្តរជាតិនេះ បានដឹងថា ប្រមុខរដ្ឋខ្មែរ ពុំបានគោរពដល់សន្ធិសញ្ញានៃទីក្រុងហ្សឺណែវនោះទេ ទើបសុំទៅប្រមុខរដ្ឋខ្មែរ ឱ្យបញ្ឈប់សកម្មភាពខុសពីសន្ធិសញ្ញានៅទៅ ប៉ុន្តែប្រមុខរដ្ឋខ្មែរ បានប្រកាសបដិសេធថា ពុំបានមានធ្វើអ្វីដែលខុសទេ ការធ្វើទាំងនោះ គឺជារឿងរបស់ខ្មែរត្រូវតែធ្វើ សម្រាប់ជាគុណប្រយោជន៍ដល់ប្រទេស និងជនជាតិខ្មែរទាំងអស់ ទោះបីជាគណកម្មាធិការរកឃើញភស្តុតាងយ៉ាងជាក់ស្តែងយ៉ាងណាក៏ដោយ ។ ដោយទ្រាំងនិងការធ្វើខុសឆ្គងរបស់ប្រមុខរដ្ឋខ្មែរនេះពុំបាន ទើបគណកម្មាធិការអន្តរជាតិនេះ សម្រេចចិត្តដកចេញពីប្រទេសខ្មែរ ទុកឱ្យប្រមុខរដ្ឋខ្មែរ បន្តកិច្ចការនេះដោយសេរីតទៅទៀតចុះ ។

### ឯករាជ្យខ្មែរត្រូវមានគ្រោះថ្នាក់

ក្រោយពីពេលដកចេញនៃគណកម្មាធិការអន្តរជាតិមក ភ្លើងសង្គ្រាមនៅក្នុងប្រទេសយួនខាងត្បូងបានឆាបឆេះរាលដាលកាន់តែខ្លាំងឡើង រហូតធ្វើឱ្យអសន្តិសុខនៅតាមបណ្តោយព្រំដែនខ្មែរ-យួន មានការកើនឡើងកាន់តែខ្លាំងក្លាដែរ ដោយសារតែកងទ័ពព្រៃយួនយៀកកុង បានយកទឹកដីខ្មែរតាមជាយដែនធ្វើជាជម្រកពួនគេចពីការវាយប្រហារយ៉ាងខ្លាំងក្លា ស្ទើរតែរកកន្លែងណាមួយជាទីឈរជើងនៃពួកទ័ពព្រៃយួនពុំបានឡើយ ។

តើហេតុអ្វីបានជាកងទ័ពព្រៃយួនយៀកកុង អាចប្រើប្រាស់ទឹកដីខ្មែរ ធ្វើជាទីជម្រកបានដូច្នេះ ? បើសន្ធិសញ្ញាក្រុងហ្សឺណែវ បានកំណត់ឱ្យប្រទេសខ្មែរត្រូវតែប្រកាន់នយោបាយអព្យាក្រិត្យឥតលំអៀង មិនត្រូវចូលដៃ និងអនុញ្ញាតឱ្យកងទ័ពជាតិដទៃណាមួយមកបោះទីតាំង ធ្វើសកម្មភាពលើទឹកដីខ្មែរបានឡើយ ដើម្បីធ្វើឯករាជ្យនៃប្រទេសខ្មែរ បានស្ថិតស្ថេរចេរកាលតទៅ ។

ប៉ុន្តែដោយសារតែមានសកម្មភាពកងទ័ពព្រៃយួនយៀកកុង កើតមានពាសពេញនៅលើប្រទេសខ្មែរដូច្នេះ ធ្វើឱ្យឯករាជ្យនៃប្រទេសខ្មែរ ត្រូវបានរំលោភឈ្លានពានពីប្រទេសយួនកុម្មុយនីស្ត ដែលបានចូលរួមចុះហត្ថលេខាក្នុងសន្ធិសញ្ញាព្រមព្រៀងគ្នានាទីក្រុងហ្សឺណែវនោះពេញទីហើយ រីឯប្រមុខរដ្ឋក៏មានឈ្មោះថា បានបំផ្លាញឯករាជ្យប្រទេសខ្លួនឯង ដោយស្វ័យប្រវត្តិដែរ ។

ដោយមើលឃើញវិបត្តិនយោបាយធំៗទាំងនេះ កើតឡើងហើយ ទើបធ្វើឱ្យកងទ័ពជាតិខ្មែរ គ្រប់អង្គភាព បញ្ញវន្តគ្រប់ជាន់ថ្នាក់ ប្រជាពលរដ្ឋខ្មែរ គ្រប់ស្រទាប់វណ្ណៈ មានការព្រួយបារម្ភ និងកង្វល់ក្នុងចិត្តយ៉ាងខ្លាំង ដោយឃើញថា ព្រឹត្តិការណ៍ដែលលេចចេញមកនេះ ប្រាកដជាដើមហេតុបណ្តាលឱ្យប្រទេស និងប្រជាជាតិខ្មែរ ត្រូវប្រឈមមុខនឹងវិបត្តិភ័យមួយយ៉ាងធ្ងន់ធ្ងរ រហូតឈានទៅដល់ធ្វើឱ្យមានមហន្តរាយទៅអនាគតដ៏ខ្លីខាងមុខជាពិតប្រាកដជៀងពុំរួចឡើយទៀតផង ។

មិនយូរប៉ុន្មានសភាពប្រែប្រួលនៃសេចក្តីសុខសាន្តសប្បាយរីករាយ និងសេចក្តីសង្ឃឹមរបស់ជនជាតិខ្មែរ ត្រូវបានរលាយទៅ០ាត់បន្តិចម្តងៗជារៀងរាល់ថ្ងៃ ។ បញ្ហាវិបត្តិនយោបាយបានចោទយ៉ាងធ្ងន់ធ្ងរដល់រដ្ឋាភិបាលរបស់ចលនាសង្គមរាស្ត្រនិយម ដែលមានប្រមុខរដ្ឋខ្មែរជាប្រធាន ធ្វើឱ្យរដ្ឋាភិបាលត្រូវបានផ្លាស់ប្តូរនាយករដ្ឋមន្ត្រីច្រើនលើកច្រើនគ្រា រហូតមកដល់តំណាក់ការក្រោយនាអំឡុងឆ្នាំ១៩៧០ ប្រមុខរដ្ឋខ្មែរបានបញ្ជាឱ្យបង្កើតរដ្ឋាភិបាលពិសេសមានឈ្មោះថា "រដ្ឋាភិបាលស្រោចស្រង់ជាតិ" មានន័យថា បញ្ហាប្រទេសខ្មែរ ត្រូវធ្លាក់ដល់កំរិតមួយជាភាពអាសន្នដ៏មហាគ្រោះថ្នាក់ហើយ ហើយត្រូវការឱ្យមានមនុស្សពិសេសមកជួយស្រោចស្រង់ឱ្យបានរួចផុតពីភាពអាសន្នដ៏មហាគ្រោះថ្នាក់នេះ ។

### ការបង្កើតរដ្ឋាភិបាលស្រោចស្រង់ជាតិ

- តើបុគ្គលសំខាន់ណាមួយដែលត្រូវបានតែងតាំងជានាយករដ្ឋមន្ត្រីពិសេស ដើម្បីដឹកនាំរដ្ឋាភិបាលពិសេសនេះ ?

លោកសេនាប្រមុខ លន់ នល់ ដែលជាមេទ័ពម្នាក់ក្នុងចំណោមមេទ័ពជាច្រើន ធ្លាប់មានវីរភាព និងភក្តីភាពចំពោះជាតិ និងមហាក្សត្រ បានត្រូវប្រមុខរដ្ឋខ្មែរ តែងតាំងឱ្យទទួលតំណែងវិសេសដ៏មានគ្រោះថ្នាក់នេះ ។

ដោយសារតែសេចក្តីអង់អាចក្លាហាន និងទឹកភក្តីស្មោះត្រង់ចំពោះជាតិ លោកសេនាប្រមុខបានយល់ព្រមទទួលបេសកកម្មពិសេសនេះ ដើម្បីជួយ



ស្រោចស្រង់ប្រទេស និងប្រជាជាតិ ។

ក្រោយពីបានបញ្ជាឱ្យលោក លន់ នល់ រៀបចំរដ្ឋាភិបាលពិសេសរួចហើយ ប្រមុខរដ្ឋខ្មែរត្រូវយ៉ាងទៅប្រទេសបារាំង ដើម្បីព្យាបាលព្រះរោគ ដោយមានលោកសេនាប្រមុខជូនដំណើរព្រះអង្គទៅដល់ប្រទេសបារាំងដែរ រួចហើយក៏ត្រឡប់មកដឹកនាំរដ្ឋាភិបាលវិញតាមប្រក្រតី ។

គួរឱ្យវិតកខ្លាំងណាស់ចំពោះស្ថានការណ៍វិបត្តិនយោបាយនៅក្នុងប្រទេសខ្មែរនេះ ដែលកើតចេញមកពីកងទ័ពព្រៃយួនយៀកកុង បណ្តាលឱ្យមានទុក្ខវេទនាដល់ប្រជាពលរដ្ឋខ្មែររស់នៅតាមបណ្តាខេត្តជាប់ព្រំប្រទល់ខ្មែរ-យួន ចេះតែមានកើនឡើង រហូតធ្វើឱ្យបណ្តាជនទាំងនោះទ្រាំទ្រមិនបានក៏ផ្ទុះចេញជាការប្រជុំបាតុកម្មទាមទារឱ្យកងទ័ពព្រៃយួន ត្រូវតែដកចេញពីទឹកដីខ្មែរ ។

(សូមរង់ចាំអានបន្តនៅលេខក្រោយទៀត)

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

## ១២-ការគ្រប់គ្រងចិត្តតាមវិធីពិនិត្យដង្ហើមៈ

**ក្នុងសមាធិវិបស្សនាមានគោលវិធី៣យ៉ាងសំខាន់ :**

ទី១- វិធីពិនិត្យដង្ហើម ឬការប្រមូលសតិលើដង្ហើម (អាណាបានស្សតិ)

ទី២- សមាធិវិបស្សនានិង

ទី៣- សសមាធិមេត្តាភាវនា ។

វិធីប្រមូលសតិលើដង្ហើម ឬវិធីពិនិត្យដង្ហើមត្រូវហាត់រៀនជាប្រចាំ ។ ក្នុងកម្មវិធីសមាធិវិបស្សនា ១០ថ្ងៃ គ្រូតម្រូវឱ្យសិស្សរៀនបង្ហាត់សតិតាមការពិនិត្យដង្ហើមអស់រយៈពេល៣ថ្ងៃ លុះចេញពីសាលាមកសិស្សត្រូវបន្តហាត់ជារៀងរាល់ថ្ងៃរហូតទៅ។

តើជាក់ស្តែងគេហាត់ពិនិត្យដង្ហើមដូចម្តេច ?

តើហេតុអ្វីក៏ដង្ហើមមានសារៈសំខាន់ដ៏ទូលំទូលាយដូច្នេះ ?

នៅពេលហាត់អង្គុយសមាធិ គ្រូណែនាំសិស្សឱ្យប្រមូលសតិដឹងមកលើដង្ហើមចេញចូលនៅត្រង់ចំណុច : មណ្ឌលត្រីកោណ ដែលមានបបូរមាត់លើជាបាត លាតសន្ធឹងលើផ្ទៃរន្ធច្រមុះទាំងមូល គឺមណ្ឌលច្រមុះទាំងមូល គិតចាប់តាំងពីកំពូលចាប់ផ្តើមត្រង់កណ្តាលថ្ងាសរហូតដល់បបូរមាត់លើទាំងមូលជាបាតរបស់ត្រីកោណ ។ ។ សិស្សត្រូវពិនិត្យវេទនារូបកាយ Body sensation ត្រង់ចំណុចតូចនេះ ។ មានន័យថាបើដង្ហើមចេញអ្នកត្រូវដឹងថាដង្ហើមចេញ បើដង្ហើមចូលអ្នកត្រូវដឹងថាវាចូល ។ បើវាវែង ខ្លី ថប់ ស្ទះ ជ្រៅ រាក់ ស្រទន់ ញ័រៗ ក្តៅ ត្រជាក់ ឧណ្ហៗ សើមស្ងួត ។ល។ អ្នកត្រូវហាត់រៀនឱ្យដឹងអាការៈទាំងអស់នោះជាតៗរៀងទៅ ។ អ្នកប្រកាន់តិរិយាបថ ដូចសត្វឆ្មាដែលដេញចាប់កណ្តុរ ។ លុះកណ្តុររត់ចូលរន្ធបាត់ឆ្មានៅសំឡឹងមាត់រន្ធមិនដាក់ភ្នែក ហើយប្រុងស្មៀតចាំចាប់កណ្តុរជានិច្ច ។ ការប្រកាន់តិរិយាបថបែបនេះជាការលំបាកពន់ពេកណាស់ សំរាប់មនុស្សពុំធ្លាប់ពីមុនមក អ្នកហាត់ទាមទារភាពអំណត់ អត់ធ្មត់ព្យាយាម និងសំរេចចិត្តម៉ឺងម៉ាត់ក្នុងការបន្តហាត់រៀនបណ្តុះទម្លាប់ថ្មីបែបនេះ ។

ឧបសគ្គឬមារដ៏ធំដែលរារាំងទប់ស្កាត់ពុំឱ្យដំណើរហាត់រៀនឈានទៅមុខបានគឺ ការបែកសតិ ។ នៅពេលដែលអ្នកកំពុងតែផ្តោតសតិលើដង្ហើមមានរឿងរ៉ាវជាច្រើនច្រៀតចូលស្រូបទាញសតិទៅក្រៅបាត់ ។ ជាក់ស្តែងដូចជាកំពុងតែហាត់ស្រាប់តែនឹកឃើញការបាត់សោរពីថ្ងៃរឿងរ៉ាវផ្សេងទៀតដែលទាក់ទងនឹងសោរនេះផុះឡើងជាបន្តបន្ទាប់ដូចជា -អញច្រឡំដៃទៅទីណា? -ជ្រុះទីណាឬទេ? នរណារើសបាន ? អូ! គេបោះចោលហើយទេដឹង? -អូ! ចាក់សោរទូដូចម្តេចបាន? យី! ស្អែកត្រូវការប័ណ្ណបើកឡាន អូ! ខកទៅធ្វើការលែងបានហើយ -ស្អែកត្រូវទទួលភ្ញៀវពិសេសផង ធ្វើដូចម្តេចទៅ???... ។ល។និង ។ល។ នេះខ្ញុំយោងដល់រឿងបាត់សោរតែមួយគត់ ប៉ុន្តែជាក់ស្តែងមានរឿងរ៉ាវជាច្រើនទៀតផុះឡើងរាប់មិនអស់ដូចជា រឿងសង្គមគ្រួសារ មុខរបរ សាសនា ការងារផ្ទះ ។ល។ រឿងរ៉ាវអស់នោះស្រូបសតិយើងបាត់ទាំងស្រុង ។ វារារាំងយើងឱ្យបាត់សតិបែកអារម្មណ៍ពុំអនុញ្ញាតិឱ្យការងារសមាធិបន្តបានទៅទៀត ។ ដូច្នេះអ្នកត្រូវហាត់ភ្ញាក់រលឹកដឹងខ្លួនថាកំពុងតែលង់ក្នុងរឿងអ្វីមួយហើយ ប្រញាប់ដកសតិពីនោះមកពិនិត្យដង្ហើមវិញបន្តការងារសមាធិទៅទៀត ។ បាតុភូតបាត់សតិនេះ ជារឿងធម្មតាដែលយើងគ្រប់រូបមានដូចគ្នា ពីព្រោះយើងត្រូវសណ្តំដោយបាតភូតលំហូរគំនិតពីបន្ទប់មេម៉ូរីមក (សូមអានអំពីកុងស្យេនិសពេលដឹងខ្លួនបន្ថែម) ។ ចូរកុំខឹងខ្លួនឯងឱ្យសោះបន្តហាត់ទៅទៀត ។ ដំបូងអ្នកលង់ក្នុងសាច់រឿងក្រៅជានិច្ច លង់ហើយលង់ទៀត កុំអស់សង្ឃឹម ចូរបន្តទៅទៀត ។ អ្នកអាចនឹងដកសតិពីការលង់លក់បានម្តងយូរៗមកបានម្តងទៀត យូរៗបានម្តងទៀត ។ យូរៗទៅកាន់តែច្រើនដងឡើងៗ។ យូរៗទៅអ្នកម្ចាស់ការទាំងស្រុងអាចដកលំសតិបានយូរនៅនឹងដង្ហើម ។ ដូច្នេះដង្ហើមបានប្រែទៅជាមជ្ឈមណ្ឌលដែលមានលំហទទេ ជាកន្លែងសំរាកបន្ទូរលំហែពីចរន្តសណ្តំ សន្ទប់នៃព្យុះគំនិតពីក្នុងមក។ បើសំរេចបានប៉ុណ្ណេះ អ្នកមានកន្លែងជ្រកកោនដ៏ប្រពៃត្រជាក់ត្រជុំ និងគួរជាទីមនោរម្យ ។ អ្នកប្រាកដជាបានរួចរំដោះពិតប្រាកដមែន ពុំមែនក្លែងក្លាយទេ ។ នេះជាបាតុភូតមួយដ៏អស្ចារ្យអាចកែប្រែជីវិតអ្នកអាចដុសខាត់ជីវិតឱ្យរស់នៅមានពេលលំហែខ្លះ ព្រោះអ្នកមានកុងតាក់បិទបើក ម្ចាស់ការក្នុងខ្លួនអ្នកតែម្តង ។ បើអ្នកចង់គិតការអ្វីមួយ ចូរអ្នកព្រលែងតាមដំណើរខួរក្បាលដូចសព្វដង ។ បើចង់សំរាកពីការគិតឬពីការរំជួលចិត្តផ្សេងៗ អីយ៉ា!!! ងាយណាស់ងាយដូចបកចេក គោលគឺអ្នកគ្រាន់តែទាញសតិមករកដង្ហើមវិញ ជាការស្រេចហាស់ហា!!!ៗ អស្ចារ្យណាស់ ។ សូមអ្នកកុំឱ្យជីវិតកន្លងទៅដោយពុំបានជួបនឹងបច្ចេកទេសរបស់ព្រះពុទ្ធបរមគ្រូ ។ យើងទាំងអស់គ្នា រស់ក្នុងអន្លង់សណ្តំនិងងងឹតនៃព្យុះចិត្តដ៏កំណាចគ្រប់ពេល ។ ភ្ញាក់ឡើងៗ (Wake up Wake up) ។ នេះហើយ ជាការត្រាស់ដឹងរបស់ព្រះពុទ្ធបរមគ្រូយើង ។ យើងអាចរកឃើញមាគ៌ាទៅកាន់ទីរួចរំដោះដ៏ពិតប្រាកដនៅលើភពផែនដីក្នុងជីវិតយើងជាមនុស្សនេះ ។ នេះជាខ្លឹមសារមួយជ្រុងនៃព្រះនិព្វានក្នុងព្រះពុទ្ធសាសនា តើអ្នកជ្រាបឬទេ ? ដូច្នេះហើយបានជាពាក្យថា ត្រាស់ដឹង គេបកប្រែជាភាសាអង់គ្លេសថា Awakening ។ (សូមអានបន្ថែមអំពីបាតុភូតលំហក្នុងដំណើរប្រតិបត្តិសមាធិ ដែលខ្ញុំរៀមរាប់ពីមុនស្រាប់) ។

ខ្ញុំគួរជំរាបជូនចំណុចមួយចំនួនទៀត អំពីសារៈសំខាន់របស់ដង្ហើម ។ ការចាប់យកដង្ហើមមកជាមជ្ឈមណ្ឌលកណ្តាលនៃសមាធិមានប្រយោជន៍បីយ៉ាងជាចំបង :

**ទី១,** ក្នុងបរិបទវប្បធម៌ អរិយធម៌ទំនើបសព្វថ្ងៃ មនុស្សយើងម្នាក់ៗរស់នៅក្រោមសំពាធលំហូរពត៌មាន (Mass-media culture) យ៉ាងខ្លួលខ្វាញ់ ។ អារម្មណ៍របស់យើងលោតផ្លោះពីរឿងមួយទៅរឿងមួយរាល់ៗវិនាទី ។

(តទៅលេខក្រោយទៀត)



# ជោគជតារាសីទាំង១២ប្រចាំឆ្នាំថោះ

**ឆ្នាំជូត** រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបកិច្ចការងារអ្វីៗក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ តែចូរកុំមានចិត្តលោភលន់ឲ្យសោះ ព្រោះការលោភលន់នាំមកនូវក្តីវិនាសអន្តរាយ ។ ចំពោះគូស្នេហ៍មានភាពល្អកល្អិនយល់ចិត្តគ្នាល្អណាស់ ៕

**ឆ្នាំឆ្លូវ** រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ីអាចរើបៗបន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមបំពងបោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្រ្តី គឺមិនត្រូវឆាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបតែសេចក្តីសុខនឹងគ្នា ៕

**ឆ្នាំខាល** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរសមទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះដោយទំនាយទាយថា អាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឲ្យគេខ្ចីរបស់របរមានតម្លៃឲ្យសោះ ព្រោះកាលបើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រឡប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាបន្តិចបន្តួច ៕

**ឆ្នាំថោះ** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំរោង** រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ ។ ចំពោះស្រ្តីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្តីប៉ាច់ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេងៗអាចកើតចេញពីពាក្យសម្តី ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែក ៕

**ឆ្នាំម្សាញ់** រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរម្ងាប់ចិត្តឲ្យបានត្រជាក់ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕

**ឆ្នាំមមី** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នក មិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕

**ឆ្នាំមមែ** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវ ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នអ្នកក្រោមកញ្ចះញង់ ៕

**ឆ្នាំវក** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំរកា** រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លីផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខណ៍អក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

**ឆ្នាំច** រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរសមទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងដើងខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកំលោះក្រមុំក្នុងរយៈពេលនេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕

**ឆ្នាំកុរ** រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរសមទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះបុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមអាចលោយទ្រព្យបាន ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

សោភ័ណភាព



# សាប៊ូខ្មៅជួយឱ្យស្បែកស្រស់ថ្លា

●អ្នកធ្លាប់បានប្រើសាប៊ូខ្មៅហើយឬនៅ ? សូមកុំខកខាន ព្រោះថាសាប៊ូខ្មៅពីធម្មជាតិរបស់អាហ្វ្រិកនេះអាចជួយដល់សុខភាពស្បែករបស់អ្នកឲ្យស្រស់ភ្លឺថ្លាបានយ៉ាងពិតប្រាកដ!

**ជំណាក់កាលទី១ :** សូមជ្រើសយកសាប៊ូពណ៌ខ្មៅនេះសម្រាប់កក់ និងដុសខ្លួនជាមួយអេប៉ុង ឬក្រណាត់។ បន្ថែមលើនេះអាចប្រើជាមួយ Shea moisturizer (សាប៊ូផលិតពីគ្រាប់រុក្ខជាតិស៊ី) ផ្តល់សំណើម និងសោភ័ណភាពដល់ស្បែកក្រោយពេលអ្នកដុសរួច ។

**ជំណាក់កាលទី២ :** សូមលាបសម្អាតមុខឲ្យបានម្តង ឬពីរដងក្នុងមួយថ្ងៃជាមួយនឹងសាប៊ូខ្មៅដោយយកកន្សែងពោះគោជ្រលក់ក្នុងទឹកក្តៅឧណ្ហៗ ពូតទឹកចេញយកដាក់លើផ្ទៃមុខប្រហែល១០នាទី ឬទុករហូតទាល់តែកន្សែងត្រជាក់ក៏បានព្យាយាមធ្វើយ៉ាងនេះឲ្យបានច្រើនដង ។ បន្ទាប់មកលាងសម្អាតផ្ទៃមុខ ប៉ុន្តែសូមកុំភ្លេចលាង សម្អាតត្រង់ ត្រចៀក ចង្កា និង.ក ជាមួយនឹងទឹកក្តៅឧណ្ហៗបន្ថែមទៀត ។ នៅទីបញ្ចប់លាប Moistuizer (ម័រធីរ៉ាយសឺ) វាផ្តល់សំណើមដល់ស្បែកដើម្បីឲ្យអាចម៉ុរញ មុនល្អិត មុនគ្រាប់ស្នាមជាំ និងកន្ទួលលើស្បែកប្រែពណ៌នឹងលោយបាត់ជាមិនខាន ។

**ជំណាក់កាលទី៣ :** ធ្វើយ៉ាងណាកក់សក់ជាមួយសាប៊ូខ្មៅពីធម្មជាតិនេះឲ្យឡើងពពុះ រួចលាងសម្អាតជាច្រើនដងរហូតសក់បានជ្រះស្អាតល្អ បន្ទាប់មកប្រើប្រេងលាបសក់ធម្មតាក៏បានសំខាន់បំផុត សូមកុំភ្លេចលាងសម្អាតផ្ទៃមុខជាមួយ សាប៊ូខ្មៅនេះរៀងរាល់យប់មុនពេលចូលដំណេក ទើបមានប្រសិទ្ធភាព ៕



# បំបាត់ស្បែកមមុខឡើងខ្លាញ់

●អ្នកដែលកំពុងមានបញ្ហាស្បែកដែលមានសភាពខ្លាញ់ លក្ខណៈស្បែកបែបនេះអាចចាត់ទុកបានថា ជាបញ្ហាមួយរំខានដល់ផ្លូវចិត្តជាងអ្នកដែលមានស្បែកសភាពដទៃ ព្រោះការតុបតែងដោយ ប្រើគ្រឿងសម្អាង ប្រេង ម្សៅ ក៏មិនអាចធានាជាប់បានយូរនោះដែរ ។ លើសពីនោះទៀត អ្នកមានសភាពស្បែកឡើងខ្លាញ់នេះភាគច្រើនប្រឈមនឹងអាការរោគមុនមុខទៀតផង ។

ដូចនេះយើងមានរូបមន្តពិសេសសម្រាប់សុភាពស្រ្តីដែលកំពុងកើតទុក្ខដោយសារស្បែករបស់ខ្លួនឡើងខ្លាញ់ ហើយហ៊ានអះអាងបានថាជារូបមន្តសម្រាប់អ្នកដែលមានស្បែកឡើងខ្លាញ់តែប៉ុណ្ណោះ ។ ចាប់ផ្តើមដំបូង ណែនាំអ្នកឲ្យប្រើប្រាស់ចាយជាំស្រួយមួយកូនចានចង្កឹះ រួចត្រូវយកទៅលាយជាមួយនឹងទឹកដោះគោជៅប្រមាណពាស្លាបព្រាបាយ ព្រមទាំងកុំភ្លេចប្រើម្សៅល្មៀត១ស្លាបព្រាបាយ រួមជាមួយផងដែរ ។

បន្ទាប់មកយកវត្ថុធាតុដើមទាំងនោះទៅកិនក្នុងម៉ាស៊ីនទឹកក្រឡុកឲ្យលាយចូលគ្នាសព្វល្អ រួចទើបយកវាមកលាបនៅលើផ្ទៃមុខឲ្យបានសព្វ ទុកចោលរយៈពេលប្រមាណពី១៥-២០នាទី ទើបប្រើទឹកស្អាតលាងជម្រះចេញ ។ យើងណែនាំឲ្យអ្នកអនុវត្តបែបនេះក្នុងមួយសប្តាហ៍១-២ដង ធានាថា ស្បែកមុខអ្នកនឹងប្រែសភាពស្រស់ថ្លាគួរឲ្យប្រណែនបំផុត ។ ទោះបីយ៉ាងណាក្តី យើងសូមឲ្យអ្នកព្យាយាមធ្វើឲ្យបានតាមការណែនាំខាងលើនេះ ព្រោះរឿងសម្រស់វាមិនចេះយល់ចិត្តនរណាម្នាក់នោះឡើយ ៕

# សាលាសិក្សាពីការបង្រៀនកាត់សក់
# ធ្វើក្រចក ម៉ាស្សាថៃស្បែកមុខ បង្រៀនធ្វើគ្រូ

ចាប់បើកហើយ ! **GRAND OPENING**

សាលារៀនដែលធំជាងបង្អស់នៅក្នុងទីក្រុង !
ចំណុះសិស្សជាង២៥០នាក់ សាលាចាប់ផ្តើមហើយ
សូមទូរស័ព្ទមកចុះឈ្មោះពីពេលនេះទៅ
ដើម្បីទទួលបាន ៥០% ចុះថ្លៃបង់សាលារៀន

**50% OFF TUTION**

គ្រូបង្ហាត់មានបទពិសោធន៍និយាយភាសាខ្មែរ
អង់គ្លេស វៀតណាម ចិន និងស្បាញ៉ុល

711 SNYDER AVENUE PHILADELPHIA., PA 19148
TEL. 215-465-1614 or 215-609-7815, Fax: 215-465-1699




PHILADELPHIA COSMETOLOGY




សាលាសិក្សាពីការបង្រៀនកាត់សក់ ធ្វើក្រចក ថែរក្សាស្បែក លំអរសម្ផស្ស ដាក់រោមភ្នែក ដកចិញ្ចើម -WAXING បង្រៀនធ្វើគ្រូ

Beauty Supply

**តម្លៃពិសេស**
កាត់សក់ប្រុស $5 ,កាត់សក់ស្រី$7,អ៊ុតសក់ លាបពណ៌សក់,បាញ់ឡាយពណ៌សក់,ធ្វើម៉ូដសក់គ្រប់មុខ

One of the Biggest Cosmetology School in Philly

## ខ្មែរប៉ុស្តិ៍ ស.រ.អា

"ខ្មែរប៉ុស្តិ៍" ត្រូវការជ្រើសរើសបុគ្គលិកផ្នែកទីផ្សារ នៅតំបន់ឡូវែល និងប្រូវីដិន មានកំរិតខ្ពស់ បើមានចំណាប់អារម្មណ៍សូមទំនាក់ទំនងមក :

សុបិន : **(267) 253-3947**, សែម : **(781) 244-0522**

## ខេនី គ្រូវេទមន្តដោយសម្មាធិ

មើលជម្ងឺនានា, ដោះមន្តស្នេហ៍, រំដោះគ្រោះ, ជួយគ្រួសារបែកបាក់,
មើលមុខរបររកស៊ី, ហុងស៊ុយ, ធ្វើយ័ន្តការពារខ្លួន ។
ចេះមន្តអាគមតាមរបៀប ចិន, យួន, ចាម ។
បើចង់ដឹងបន្ថែមសូមទំនាក់ទំនងតាមរយៈទូរស័ព្ទ:
(540) 397-2603 ខ្ញុំឈ្មោះ "KENNY"



## ការិយាល័យមេធាវី ដរីង នឹង បរូស្គី
## LAW OFFICE DOERING & BOROWSKY, LLC

**ទទួលការពារផលប្រយោជន៍លោកអ្នក ករណីទូទៅតាមផ្លូវច្បាប់ដូចជា :**

. ករណីបើរបរពាណិជ្ជកម្ម និងផ្ទេរប្រាក់ក្នុងមុខជំនួញ
. ករណីទិញលក់អចលនវត្ថុ ដូចជាផ្ទះសម្បែង ដីធ្លីជាដើម
. រើសអើងនៅកន្លែងធ្វើការ
. ករណីអន្តោប្រវេសន៍

**ធ្លាប់មានបទពិសោធន៍ខ្ពស់ _ផ្តល់សេវាជីនតាមវិជ្ជាជីវៈហើយតម្លៃក៏សមរម្យទៀតផង _យើងអាចមានអ្នកបកប្រែភាសាជូនលោកអ្នកបាន ។**



General practice law office handing matters in :
Corporations and business Transations
Real Estate
Work Place discriminations
Immigration
Experienced, professional service and reasonable rate Interpreter available

**Office: (215) 667-8118 1650 Market st. Ste 3600 Philadelphia, PA 19103**
**Cell: (215) 840-1364; Email: dblawyers@gmail.com**

## Documentary Film Screening: "More Than A Roof"

Wednesday, June 8th at 7pm
Asian Arts Initiative
1219 Vine Street
Philadelphia, PA 19107
(215) 557 0455 ext. 221
www.asianartsinitiative.org

**បណ្ណនិញ្ញបញ្ជាការសែតខ្មែរប៉ុស្តិ៍**
ឈ្មោះ និងអាស័យដ្ឋានរបស់

ឈ្មោះ :..............................................................................
អាស័យដ្ឋាន : ......................................................................

**ខ្ញុំចង់បាន :**

☐ កាសែតខ្មែរប៉ុស្តិ៍ ១ខែ មាន២លេខ ៦ខែ $30 ១២ខែ $60ឬ $70 អឺរ៉ូ សម្រាប់អឺរ៉ុប
☐ សៀវភៅឈ្មោះ ...................................តម្លៃ $...................
☐ ស៊ីឌីប្រវត្តិសាស្ត្រខ្មែរ ៤ ម៉ោង តម្លៃមួយសិត $30
ខ្ញុំភ្ជាប់សែក ឬ មនីអដ័រ មក U.A.M.G តម្លៃ $...................
ផ្ញើមក U.A.M.G 438 LINDLEY AVE. PHILADELPHIA, PA 19120
**Phone : 267-253-3947**

# ពិភពវីដេអូខ្មែរ
# Khmer World Videos





301 Reservoirs Blvd. Cranston, RI 02907

**KIM (401) 808-9336**

## Lowell: Restaurant Business for Sale

## ដំណឹងលក់ហាងជាបន្ទាន់

Full Liquor License

QUICK SALE!!!!

More Information contact Mr. Huong – 978-289-7878





SOUPER BOWL RESTAURANT

1733 Middlesex Street Lowell, MA 01851 978.937.3388



Massachusetts Council on

# Compulsive Gambling

*We understand the problem. We can help.*

## ក្រុមប្រឹក្សារដ្ឋម៉ាសាឈូសេតសំរាប់
## ការញៀនល្បែងស៊ីសង

"ប្រសិនបើលោកអ្នក ឬនរណាម្នាក់ដែលអ្នកស្គាល់
មានបញ្ហាញៀនល្បែងស៊ីសង សូមទូរស័ព្ទមកលេខ
ខាងក្រោម អាចជួយជាអ្នកសម្ងាត់ ហើយ
សួររកសៀវភៅសម្រាប់ឱ្យអាចជួយខ្លួនឯងបាន
ជាភាសាខ្មែរដោយឥតគិតថ្លៃ"

# 1-857-383-3577

ជំហានដំបូងរបស់អ្នកឆ្ពោះទៅកាន់ការផ្លាស់ប្តូរ

www.asianproblemgambling.org



# Growing Asian Senior Services in Health Care

●●●សមាគមបំរើព្រឹទ្ធាចារ្យអាស៊ីដំបូងបង្អស់ ឈ្មោះ PASSI បានប្រារព្ធពិធីជប់លៀងដ៏ត្រចះត្រចង់មួយ នៅប្លូបែល កាលពីថ្ងៃសុក្រទី២០ ខែឧសភាកន្លងទៅ ។ កម្មវិធីរាត្រីនោះ ឧទ្ទិសដល់ការខិតខំប្រឹងប្រែងដ៏គួរឱ្យកោតសរសើររបស់អ្នកដឹកនាំ និងបុគ្គលិកថែទាំសុខភាពរបស់មនុស្សចាស់អាស៊ី ។

*By Soben Pin*

Blue Bell, PA –Penn Asian Senior Services (PASSi) the first non-profit home care agency that focused serving Asian population in the Commonwealth of Pennsylvania held its 5th Annual Gala to Benefit Asian American Seniors on Friday May 20th. The program was dedicating to honor the Distinguished Health Leaders and their staffs for Kindhearted Service Awards.

**The Distinguished Health Leaders Award Recipients:**

Joan Block, the Executive Director & Co-Founder of Hepatitis B Foundation George P. Moy, Co-Founder of Philadelphia Chinatown Development Corporation Evelyn Marcha Hidalgo, CEO Executive Director of Intercultural Family Services, Inc.

Among of the Kindhearted Service Award Recipients, PASSi Cambodian speaking Home Health Aid, Ms. Savon Mok, was recognized for her compassion and dedication toward the client she served.

The Night of the Celebration was filled by presenting distinguished health professional awards and cultural performances by Korean traditional dancer/choreographer and Philippine Folk Arts Society.

PASSi was found in 2005 starting with an over $400,000 in budget and quickly increased to over 3 millions dollars in operating budget in 2010. It provides in home care services to Asian Seniors and disables adults in Philadelphia, Montgomery, and Delaware counties who have low income, referred by Agencies on Aging or the Department of Public Welfare. Out of 255 seniors PASSi has served last year, only 11% were Cambodian recipients comparing to 42% Korean, 19% Chinese, and 20% Vietnamese.

Additionally, through state licensed vocational school, PASSi able to offer Home Health Aide Training, Nurse Aide Training, and Vocational ESL for Healthcare Workers. Class such as Home Health Aide Training does not require students to be able to speak English because class will be taught in student's language if student body is 13 or more per class. While 42 Home Health Aides were trained in 2009 has been increased to 86 students in 2010, Cambodian Home Health Aides still noticeably slow growing from 4 students to 5 students. PASSi employed 88% of its trained Home Health Aides and has employed 236 full-part time Home Health Aides last year and still looking to increase training and hiring more Home Health Aides in many different Asian languages.



George P. Moy



Im Ga choi Founde/Executive Director    Kindhearted Service Award Recipients & Board Member





Joan Block



Evelyn Marcha Hidalgo





